# ខ្មែរប៉ុស្តិ៍ ស.រ.អា
# KhmerPost USA
Printing The Cambodian World News

VOL. 06 ISSUE 89 Aug 30th - Sept 9th, 2011



សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
438 LINDLEY AVE.
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY


មាតិការឿង | ទំព័រ



# បុណ្យអុំទូកនៅ ហ្វីឡាដែលហ្វៀបន្ត



●●● ប្រធានគណកម្មការបុណ្យអុំទូកហ្វីឡាដែលហ្វៀរៀបចំឡើងដោយវត្តព្រះពុទ្ធវង្សតំណាងដោយលោក សុង ភូ បានឱ្យដឹងថា : កម្មវិធីអុំទូកខ្មែរសម្រាប់ថ្ងៃទី១០កញ្ញាកំពុងមានដំណើរការល្អ ដោយមកទល់ពេលនេះមានក្រុមអុំទូកចូលប្រកួតចំនួន១២ក្រុមបានចុះឈ្មោះ ដោយក្នុងនោះមាន

តទៅទំព័រទី ០៧

# ខ្យល់ព្យុះ អាយរីន បោកបក់ ឆ្នេរខាងកើត ស.រ.អា

Hurricane Irene
11 PM EDT Sat Aug 27 2011
Position 37.3 N 75.4 W
Maximum Winds 80 mph
Gusts 95 mph
Movement NNE at 16 mph
Minimum Pressure 954 mb (28.16 inches)

Blue Marble basemap imagery courtesy NASA
Satellite 3:49 AM UTC 11:49 PM EDT

ចុងសប្តាហ៍ថ្ងៃទី ២៦ ខែ សីហា នេះ ខ្យល់ព្យុះបានបោកបក់ក្នុងកិរិតញ "លើឆករដ្ឋហ្គ្ល័រីដា" យ៉ាងខ្លាំងក្លា ហើយបន្តដំណើរតាមឆ្នេររដ្ឋ "ណតការ៉ូឡាយណា" "រដ្ឋវៀរស៊ីនីញ៉ា" (ឆ្នេរមុទ្រ) បង្កើត

តទៅទំព័រទី ៦

# ប្រទេសលីប៊ី កាដាហ្វី លែងធ្វើឱ្យគេខ្លាចទៀតហើយ



●●●កូឡូណែល កាដាហ្វី ឡើងកាន់អំណាចលើប្រទេសលីប៊ី៤២ឆ្នាំហើយដោយរដ្ឋប្រហារប្រជាពលរដ្ឋប្រទេសលីប៊ីមានការធុញថប់ និងអំណាចផ្តាច់ការរបស់ជនជាប្រមុខនោះ ក៏នាំគ្នាកាន់អាវុធប្រមូលគ្នាបណ្តេញប្រមុខនៃប្រទេសខ្លួន ដែលកាន់ចង្កូតប្រទេសមិនព្រមលែង ។ កម្លាំងប្រដាប់អាវុធដែលផ្តើមពី៦ខែមុន ឥឡូវកម្លាំងរហូតដល់វាយយករដ្ឋធានីនយោបាយទ្រីប៉ូលី បានកាលពីចុងសប្តាហ៍ទី២០ខែសីហាមុននេះ ។

ក្រុមប្រជាពលរដ្ឋដែលដឹកនាំដោយក្រុមប្រឹក្សាជាតិ បានរុញច្រានកងកម្លាំងពិសេសរបស់ កាដាហ្វី ដែលប្រើទ័ពស៊ីឈ្នួលមកពីបរទេស ដោយមានការទទួលស្គាល់ពីសហគមន៍អឺរ៉ុប ពីអាមេរិក ហើយការពារពីលើអាកាសដោយទ័ពអូតង់ ។ ដំណាក់ការណ៍ចុងក្រោយបានចូលមកដល់ទ័ពប្រជាពលរដ្ឋបានចូលកាន់កាប់ក្រុមទ្រីប៉ូលីមួយសប្តាហ៍ហើយចាប់បានកូនប្រុស កាដាហ្វីម្នាក់ កូឡូណែល កាដាហ្វី ទំនងជានៅលាក់ខ្លួននោទីណាមួយនៃក្រុងទ្រីប៉ូលីនៅឡើយ ។

កាដាហ្វី មានឈ្មោះជាជនឧក្រិដ្ឋត្រូវក្រុមប្រឹក្សាជាតិរកចាប់ខ្លួនដោយអំពើសម្លាប់មនុស្ស អំពើរំលោភបំពានសិទ្ធិមនុស្ស ។ អំណាច កាដាហ្វី នៅរួញមកត្រឹមការពារខ្លួនឯងមិនបាន មិនអាចធ្វើឱ្យនរណាខ្លាចទៀតទេ ។

**ដោយ : ខ្មែរប៉ុស្តិ៍**

# ប្រទេសស៊ីរីក៏នៅក្បែរជ្រោះ

●●●ការបះបោរនៅពិភពអារ៉ាប់បានប៉ះពាល់យ៉ាងដំណាំទៅលើការគ្រប់គ្រងនៃប្រទេសស៊ីរី ថ្ងៃ១៥មិនាឆ្នាំ២០១១ប្រជាពលរដ្ឋស៊ីរីបានផ្តើមប្រឆាំងនឹងអំណាចផ្តាច់ការនឹងគ្រួសារនិយមរបស់ បាចា អែល អាសាដ ដែលបានកាន់អំណាចបន្តពីឪពុកដោយសារការធ្វើប្រជាមតិនៅឆ្នាំ២០០០ រីឯឪពុកឈ្មោះ ហាហ្វេ អែលអាសាដ បានឡើងកាន់អំណាចកាលពីឆ្នាំ១៩៧០ដោយរដ្ឋប្រហារ បូករួមទាំងអស់មានការកាន់អំណាច៤១ឆ្នាំ ការរើបំរះលើគ្រប់កន្លែង កាលពីខែមីនាឆ្នាំ២០១១នេះ នៅស៊ីរីបានទទួលការបង្រ្កាបយ៉ាងចាស់ដៃបណ្តាលឱ្យអង្គភាពប្រជាជាតិបន្ទោសពីការបាត់បង់ជីវិតបាតុករប្រមាណ១៤០០នាក់ ទាហានខ្លះបាក់ទឹកចិត្ត ហើយទៅចុះចូលចលនាបះបោរថែមទៀត ។ ថ្វីត្បិតតែការបង្រ្កាបបានបង្កើនកម្លាំងតាំងពីខែមេសាមកភាពរំជើបរំជួលនៅតែមាន សភាពអឺរ៉ុប អាមេរិក នឹងអង្គការសហប្រជាជាតិ បានដាក់ដង្ខៀបលើប្រធានាធិបតី បាចា អែល អាសាដ ឱ្យប្រើលទ្ធិប្រជាធិបតេយ្យ នឹងគោរពសិទ្ធិពលរដ្ឋរបស់ខ្លួន ។

ដូចគ្នានឹងប្រទេសលីប៊ីប្រទេស ស៊ីរី នៅមាត់ជ្រោះដ៏ជ្រៅនៃការប្តូររបបនៅក្នុងប្រទេស នឹងនៅក្នុងតំបន់ ។ របបផ្តាច់ការដែលជនផ្តាច់ការជាច្រើន



ប្រើក្រោមឆ័ត្រនៃសាសនា នឹងក្រោមឆ័ត្រនៃសម្ព័ន្ធភាពជាមួយបរទេស ពុំបានលាក់ជិតនៅក្នុងសម័យព័ត៌មានសេរីបានត្រូវហូរហៀរតាមរយៈបច្ចេកវិជ្ជាទំនើបការកាត់ផ្តាច់ឫសនៃមេដឹកនាំដ៏កំសត់ទាំងនោះមិនឱ្យចាក់ឫសមាំទាំទៅបាន។

**ដោយ : ខ្មែរប៉ុស្តិ៍**

# កឹម សុខា : ហ្វីឡាដែលហៀ នៅតែទីក្រុង ដ៏រឹងមាំសម្រាប់បក្សសិទ្ធិមនុស្ស

ដោយ : អ៊ុម ឈឿម

ថ្លែងទៅកាន់សមាជិក សមាជិកា និងថ្នាក់ដឹកនាំសំខាន់ៗប្រមាណជា៣០នាក់ តាមប្រព័ន្ធទូរស័ព្ទកាលពីថ្ងៃអាទិត្យទី២១ សីហា កន្លងមកនេះ លោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្សបានថ្លែងប្រាប់ដល់សកម្មជន និងអ្នកគាំទ្ររបស់ខ្លួនថា "បច្ចុប្បន្នគណបក្សសិទ្ធិមនុស្សកំពុងតែមានសន្ទុះទៅមុខយ៉ាងខ្លាំង និងមានអ្នកគាំទ្រកាន់តែច្រើនឡើងៗជាលំដាប់។ លោកបន្តថា : សព្វថ្ងៃរូបលោកផ្ទាល់ ក៏ដូចជាសកម្មជនថ្នាក់ដឹកនាំដទៃៗ ទៀត មានការធ្វើមមារញឹកក្នុងការចុះតាមមូលដ្ឋានគ្រប់បណ្ដាខេត្តក្រុងទាំងអស់ ពង្រឹងដល់សកម្មជនតាមភូមិ-ឃុំ ជាពិសេស គឺផ្ដោតទៅលើក្រុមយុវជន ដែលពួកគេគឺជាកោសិកាសម្រាប់ប្រទេសជាតិ ។





លោក សុខា សំដែងដោយសុទិដ្ឋិនិយមថា "នៅឆ្នាំ២០១៣ខាងមុខ គណបក្សសិទ្ធិមនុស្សពិតជាយកជ័យជំនះលើគណបក្សប្រជាជនកម្ពុជា ដែលកំពុងងប់ងល់នឹងអំណាចពុំខាន បើសិនជាការបោះឆ្នោតប្រព្រឹត្តទៅដោយសេរី និងយុត្តិធម៌មែននោះ" ប៉ុន្តែក្នុងគ្រាដំណាលគ្នានោះ លោក សុខា បានទទួលស្គាល់ថា បច្ចុប្បន្នរដ្ឋាភិបាលបានក្ដោបក្ដាប់ទៅលើប្រព័ន្ធឃោសនាទាំងស្រុងរួចទៅហើយដែលនេះជាហេតុនាំឱ្យមានការពិបាកក្នុងការផ្សព្វផ្សាយអំពីគោលការណ៍របស់បក្ស ដើម្បី

តទៅទំព័រទី០៧

# អង់គ្រេ ភ្លក់ម្ហូប "សាំភ្លីខ្មែរ"

ដោយ : ខ្មែរប៉ុស្ដិ៍

បន្ទាប់ពីពិធីអុំទូកដ៏គគ្រឹកគគ្រេង នៅឡូវែលមក ស្រាប់តែមានអ្នកសារព័ត៌មានតាមទូរទស្សន៍ ដ៏ល្បីល្បាញម្នាក់ឈ្មោះ អង់គ្រេ ជីមមើន ដោយសារការភ្លក់ម្ហូបអាហារនៃវប្បធម៌ផ្សេងៗ បានចូលមកភ្លក់ម្ហូបនៃស្ដារដៃអាហារដ្ឋានខ្មែរឈ្មោះ "សាំភ្លីខ្មែរ" ដែលធ្វើឱ្យភាពគគ្រឹកគគ្រេងនៃការនិយាយពីម្ហូបខ្មែរនៅបន្តបានមួយរយៈទៀត។



ក្រោមបការនៃអ្នកនិពន្ធ មូរ៉ន សរសេរឱ្យកាសែតឡូសាន់ ចេញផ្សាយនាថ្ងៃ២៥សីហានេះ អ្នកភ្លក់ម្ហូបចំឡែកៗពីគ្រប់ប្រទេសគ្រប់វប្បធម៌ ហើយបង្ហាញតាមទូរទស្សន៍ "ត្រាវែលឆាណែល" បានស្វែងរកវប្បធម៌ចម្លែកៗនៅតំបន់បូស្តុន ដើម្បីបង្ហាញដូចដែលធ្លាប់បង្ហាញពីមុនៗមក ពីរស់ជាតិនៃម្ហូបដូចជា ពស់, ចង្រិត ដែលវប្បធម៌ទូទៅពុំដែលហូប អង់គ្រេ ជីមមើន បានរកឃើញអាហារដ្ឋានតូចច្រឡឹងមួយ នៅឡូវែល ដែលមានលក្ខណៈជាវប្បធម៌ខ្មែរ លក្ខណៈជាយុវជនជាអ្នកដឹកនាំសាំភ្លីខ្មែរ ហើយបានភ្លក់ "ស្លាបមាន់ហិរ" ដែលជាម្ហូបប្រចាំត្រកូល ហើយភ្លក់ភ្លាពោះគោទឹកប្រហុក ភ្លក់បបរសាមចូក ដែលពោះវៀនជ្រូក និងម្ហូបចម្លែកផ្សេងៗទៀត ដែលបការ មូរ៉ន នឹងរូបថត ដេវីដប្រូ បានណែនាំ

តទៅទំព័រទី ១១



# ក្រុងខ្មែរ នៅឡុងប៊ិច និងឡូវែល



រូបថតភ្នំពេញប៉ុស្តិ៍ផ្សាយពីឡុងប៊ិច

**ដោយ : ខ្មែរប៉ុស្តិ៍**

**ឡុងប៊ិច :** ក្រុងខ្មែរ នៅឡុងប៊ិច ឆ្នេរខាងលិចបានចាប់កំណើតតាមសេចក្តីសម្រេចរបស់ គណក្រុមប្រឹក្សាក្រុងឡុងប៊ិច នាថ្ងៃទី៣ កក្កដា ឆ្នាំ២០០៧ ដោយការបោះឆ្នោតសម្លេងយល់ព្រម ៨ទល់នឹង១ ។ ការចាប់កំណើតនេះជាមោទនភាពដ៏ថ្លៃថ្លារបស់ប្រជាជាតិមួយដែលធ្លាប់តែសកម្ម ធ្លាប់មានអត្តសញ្ញាណទាំងវប្បធមិ និងទាំងសង្គមយ៉ាងច្បាស់លាស់ ដែលបានមកតាំងទីចាក់ឫសគ្រួសារ តាំងតែពី ៣០ឆ្នាំមកហើយ ។

ទើបតែដើមខែកក្កដា ឆ្នាំនេះប៉ុណ្ណោះ គេមានការលើកផ្លាកកំណត់ព្រំដែន "ក្រុងខ្មែរ" លើផ្លូវអាណាហែម យ៉ាងសង្ហា មិនចាញ់ ឆាយណាថោន ឬប៊ីទីសាយគូន នោះឡើយ ។ អ្នកស្រីប្រធាន Cambodia Town Inc. បានឱ្យដឹងថា នៅមានផ្លាកសញ្ញាដូចគ្នានេះចំនួន១៤ទៀតនឹងត្រូវលើកឡើងមុនដំណាច់ឆ្នាំ ដើម្បីកំណត់ព្រំប្រទល់ភាគខាងជើង និងភាគខាងត្បូងឱ្យបានចប់ ។

កាសែតភ្នំពេញប៉ុស្តិ៍សរសេរផ្សាយជំរឿនប្រជាជននៅ ស.រ.អា ថាវត្តមានរបស់ជនជាតិដើមកំណើតខ្មែរមាន២៤១.០២៥នាក់ ហើយលោក ឆាង សុង អតីតរដ្ឋ-មន្ត្រីសាធារណរដ្ឋនិយាយថា ខ្មែរប្រមាណ៥ម៉ឺននាក់មករស់នៅឡុងប៊ិចនេះ ដែលជាចំនួនលើសគេបង្អស់របស់សហគមន៍ច្រើន **តទៅទំព័រទី ១២**

## អានក្នុងវេបសាយវត្តត្រៃរតនារាម

### បច្ចុប្បន្នគណកម្មាធិការនាយកថ្មីរបស់វត្តត្រៃរតនារាម

| | |
|---|---|
| ១-សាន ប៊ុន ប្រធាន | ៧-វីដា អេង សមាជិក |
| ២-ស ឆែល លេខាធិការ | ៨-រិទ្ធី អ៊ុង សមាជិក |
| ៣-អ្នកស្រី វិយ៉ាដា ហុងទិត លេខាធិការ | ៩-វ៉ាន តាណា វ៉ែន សមាជិក |
| ៤-ដារារិទ្ធ អ៊ុង ហិរញ្ញិក | ១០-កុសល នាគ សមាជិក |
| ៥-សម្បត្តិ ហ៊ើណែល សមាជិក | ១១-សំអឿន សេង សមាជិក |
| ៦-សម្បត្តិ កែវ សមាជិក | ១២-អ្នកស្រី ចាន់រ៉ន ម៉ុមសមាជិក |

(នៅចន្លោះម្នាក់ទៀតដែលពុំទាន់ឃើញមានតែងតាំង)

**គណកម្មាធិការអាចារ្យវត្ត**

ផាន់ មន - សារឿន ធូ- ឱម ដូ-សម្បត្តិ ហួត-លៀង ម៉ុម

**គណកម្មាធិការយាយជីវត្ត**

គិម ឡេង ពុធ-ហួត រស់-សុខុម អ៊ុង

**គណកម្មាធិការព្រះសង្ឃ**

ព្រះតេជគុណ សារិន សែម ចៅអធិការ

ព្រះតេជគុណ ឈីវ នាថ ហួរ គ្រូសូត្រស្តាំ

ព្រះតេជគុណ ប៉ាវ ប៉ាក់ គ្រូសូត្រឆ្វេង

ព្រះតេជគុណ គិម សឿម ង៉ែត សមាជិក

KHMER POST USA, LLC
East Coast Publication

Pin Samkhon,
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* Loeum Im, Audria Chea,

*Contributed Writers:*
Mam Yin, Kim Phien, Lanica Angpak, &
KhmerPostLowell@gmail.com

Soben Pin
*Marketing Director*
KhmerPostUSA@gmail.com
267-253-3947
Sam Khoeun
*Sales Consultant*
(781) 244-0522

*Design Staffs:*
Leang Heng & Mong Meng

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

តមកពីទំព័រទី ១

# ខ្យល់ព្យុះអាយរីនបោកបក់...

ការភ័យព្រួយដល់ពលរដ្ឋ និងអ្នកគ្រប់គ្រងយ៉ាងក្រៃលែង ។ ក្នុងពេលយើងកំពុងសរសេរនេះ (ថ្ងៃសៅរ៍ម៉ោង ៩ យប់) ខ្យល់ព្យុះបានបក់មកដល់ "ខេបមេដ" រដ្ឋធានីវ៉ាស៊ីនតុន និងដែនដីញូជើស៊ី ហើយវិទ្យុ ទូរទស្សន៍ បានផ្តល់ព័ត៌មានឱ្យប្រជាពលរដ្ឋចាកចេញពីតំបន់សមុទ្រ ដូចជា ក្រុងញូយ៉ក ក្រុងអាត់ឡង់ទីកស៊ីទី ដែលជាក្រុងកាស៊ីណូដ៏ធំបង្អស់នៅឆ្នេរខាងកើត ។ ប្រជាពលរដ្ឋរាប់ពាន់នាក់បានចាកចេញធ្វើដំណើរទៅរកតំបន់សុវត្ថិភាព អភិបាលរដ្ឋ ឬចៅហ្វាយក្រុងប្រកាសភាពអាសន្នច្រើនដង ដើម្បីអញ្ជើញ ពលរដ្ឋឱ្យប្រ-ញាប់ចាកចេញពីផ្ទះមាត់សមុទ្ររបស់ខ្លួន ។ នៅរដ្ឋផេនស៊ីវេនា មានកំណើតខ្យល់គួចកំណាចមួយទៀត នៅល្ងាចថ្ងៃសៅរ៍កំពុងតែបំផ្លាញផ្ទះសម្បែងអស់ ១៥-១៦ខ្នងរួចហើយទឹកជំនន់ ទឹកភ្លៀងក៏កំពុងឡើងមុំ "ដែលវ៉េ" ភ្លើងអគ្គិសនីហ៊ីឡាខាងជើងឈៀងខាងកើតដាច់ជាច្រើនអន្លើ ។




48-hour formation potential: Low <30% Medium 30-50% High >50%

នៅពុំទាន់មានទទួលសេចក្តីរាយការណ៍ពីការខូចខាតដោយសារខ្យល់ព្យុះអាយរីននៅឡើយ តែគេនៅចាំថា ខែសីហា ឆ្នាំ២០១១ នេះភូមិភាគខាងកើតបានទទួលរងគ្រោះបាតុភូតធម្មជាតិបីដង គឺអាកាសធាតុក្តៅលើស១០០ អង្សា កាលដើមខែ រញ្ជួយផែនដីកាលពីកណ្តាលខែសីហានេះ ចុងបង្អស់ខ្យល់ព្យុះ ។

បន្ថែមចំណុចពីរ : ខ្យល់ព្យុះនេះធ្វើឱ្យមនុស្សពាឥស្លាប់ដំណឹងចុងក្រោយ ៕

# រញ្ជួយដីនៅច្រាំងខាងកើត

**ដោយ : ខ្មែរប៉ុស្ដិ៍**

• ផែនដីបានផ្ដើមរញ្ជួយយ៉ាងរន្ធើននៅហ្វីឡាដែលហ្វៀ នាវេលាម៉ោងពារសៀលនៃថ្ងៃអង្គារទី២៣ សីហា នេះ ។ នេះជាលើកដំបូងបង្អស់ដែលហ្វីឡាដែលហ្វៀមានបាតុភូតរញ្ជួយផែនដីនេះស្ទើរធ្វើឱ្យប្រជាពលរដ្ឋជឿមិនបាន ប្រសិនបើគ្រប់ប្រព័ន្ធផ្សព្វផ្សាយពុំបានបញ្ជាក់ពីព្រឹត្តិការណ៍ដ៏ថ្មីបំផុតនៅឆ្នេរខាងកើតនេះទេ ។

ផែនដីបានផ្ដើមរញ្ជួយពីតំបន់រដ្ឋធានីវ៉ាស៊ីនតុន ហើយរាលដាលដល់ហ្វីឡាដែលហ្វៀ ហើយបន្តយ៉ាងលឿនដល់ទីក្រុងញូយ៉កក្នុងកម្លាំង៥.៨ តែប៉ុន្មានវិនាទីយ៉ាងខ្លីភាពរញ្ជួយក៏ស្ងប់ស្ងាត់ទៅវិញ។ នៅអាគារសាធារណៈជាច្រើន នាតំបន់ទាំងប៉ុន្មានខាងលើ ក៏បានត្រូវបញ្ជាឱ្យជន្លៀសខ្លួនចេញពីអាគារធំៗទាំងនោះ ជាបន្ទាន់ដែរ ដើម្បីការពារសុវត្ថិភាព។

ភ្លាមៗបន្ទាប់ពីភាពរញ្ជួយបានបញ្ចប់ទៅ ទោះជាមានការវិភាគខ្លះ ស្ដីពីប្រភពធម្មជាតិនៃមណ្ឌលផ្ដើមរញ្ជួយក្ដី អ្នកតាមដានមួយចំនួនមិនចោលទស្សនៈថា អាចនឹងមានការសាកល្បងគ្រាប់បែកបរមាណូនៅក្នុងដីនៅកន្លែងសម្ងាត់ណាមួយជាមិនខាន៕

តមកពីទំព័រទី ១

## បុណ្យអុំទូកនៅហ្វីឡាដែលហ្វៀ...

កីឡាករអ្នកអុំចំនួន១០០នាក់ ការប្រណាំងទូកនឹងប្រព្រឹត្តទៅនៅទន្លេនា "ផិមឡេនឌីង" ក្រោមការតាមដានសុវត្ថិភាពយ៉ាងគ្រប់គ្រាន់។

ពាណិជ្ជករកំពុងចុះឈ្មោះបន្តបន្ទាប់ចូលមកបង្ហាញផលិតផលរបស់ខ្លួន ដែលអ្នកមកទស្សនាអុំទូកអាចភ្លក់រស់ជាតិម្ហូបខ្មែរ-ឡាវ-ថៃញ្ញ ឬហ្វីលីពីនយ៉ាងប្លែកមាត់ជាមួយក្រុមគ្រួសារបាន ។

ថវិកាគាំទ្របានមកពីវត្តព្រះពុទ្ធរង្សី ពីផ្សារស្ទ្រីងត្ដាខ៊ិន "ពីកាស៊ីណូស្ងួតរហារ" ពីក្រុមហ៊ុន "ធារាវ៉ាប់រងណោសិនវ៉ាយ" រីឯកម្មវិធីកំដរភ្ញៀវនៅលើឆាកមានជាអាទិ៍ការ សូត្រមន្ដជូនពរសព្ទសាធុកាដល់ភ្ញៀវ-មានរបាំបុរាណខ្មែរជូនពរ-សុវណ្ណមច្ឆា-នារីជាជួរ មានការបង្ហាញរបាំ ទំនៀមទំលាបឡាវ-ការបង្ហាញរបស់ក្រុមនិស្សិតប៊ូថាន ចូលរួមដោយក្រុមភ្លេងសម័យច្រើនក្រុម ក្រុមចំរៀងហ៊ីបហប ឬក្រុមរបាំប្រេកដិនរបស់យុវជនសម័យច្រើនក្រុមផង។

កម្មវិធីដែលនឹងផ្ដើមនៅម៉ោង១១ព្រឹកថ្ងៃសៅរ៍ ទី៩កញ្ញាឆ្នាំ២០១១នឹងបញ្ចប់ទៅវិញនៅម៉ោង៥ល្ងាច ដោយការប្រកាសផ្ដល់ពានរង្វាន់ដល់ជ័យលាភីអុំទូក៕ **ដោយ : ខ្មែរប៉ុស្ដិ៍**



# បុណ្យពុទ្ធាភិសេកនៅវត្តព្រះពុទ្ធរង្សី

**ដោយ : អ៊ុម ធឿម**

បើគេធ្វើដំណើរកាត់តាមផ្លូវលេខ៦មកដល់ផ្លូវ Ritner នាតំបន់ហ្វីឡាដែលហ្វៀខាងត្បូង គេនឹងបានឃើញអារាមពុទ្ធសាសនាដ៏ប្រណិតមួយដែលមានរចនាបថបែបបុរាណ និងរលេចដោយក្បាច់ក្បូរដ៏ល្អប្រណិត ដែលញាំងឱ្យមានការជាប់ចិត្តជិតអារម្មណ៍ពីសំណាក់អ្នកផងទាំងពួង ដែលធ្វើដំណើរកាត់។ ពិសេសជាងនេះព្រះពុទ្ធអង្គកំពុងគង់ព្រះព្ធែន និងមានទំហំយ៉ាងធំ ដែលវិចិត្រករចំណាយពេលវេលាជិត២ឆ្នាំក្នុងការរចនានោះ ក៏ជាផ្ទាំងស៊ីបមួយដ៏សំខាន់ក្នុងការដាស់អារម្មណ៍ដល់បណ្ដាអ្នកឆ្លងកាត់គ្រប់ជាតិសាសន៍ឱ្យគយគន់ស្ទើរមិនចង់ដាក់ភ្នែក។



នេះជាវត្ត "ព្រះពុទ្ធរង្សី" ដែលជាវត្តដ៏ប្រណិត និងលេចធ្លោរជាងគេក្នុងចំណោមវត្តខ្មែរទាំងបួនក្នុងទីក្រុងហ្វីឡាដែលហ្វៀ ហើយកាលពីថ្ងៃសៅរ៍-អាទិត្យ ទី២១-២២ ខែសីហា កន្លងមកនេះ វត្តដែលមានអាយុកាលទើបបាន៨ឆ្នាំនេះបានប្រារព្ធធ្វើពិធីបុណ្យសាសនាមួយឈ្មោះថា "ពុទ្ធាភិសេក" ដែលជាពិធីឆ្លងផ្ទាំងគំនូរព្រះពុទ្ធរូបដ៏ធំមួយដូចយើងបានរៀបរាប់ខាងលើ ។

កម្មវិធីបុណ្យមានសភាពយ៉ាងល្អរលូន និងប្រកបដោយបរិយាកាសសប្បាយរីករាយដោយមានពុទ្ធបរិស័ទ និងភ្ញៀវកិត្តិយសយ៉ាងច្រើនកុះករ។ ទាក់ទងនឹងការវិវឌ្ឍន៍របស់វត្ត "ព្រះពុទ្ធរង្សី" នេះ យើងនឹងព្យាយាមសុំការអនុញ្ញាតដើម្បីធ្វើកិច្ចសម្ភាសន៍ពីសំណាក់ព្រះគ្រូចៅអធិការ ហើយធ្វើការចុះផ្សាយនៅពេលក្រោយទៀត៕





តមកពីទំព័រទី ៤

## កឹម សុខា : ហ្វីឡាដែលហ្វៀនៅតែ...

ឱ្យបានជ្រួតជ្រាបដល់ប្រជាពលរដ្ឋនៅតាមចុងកាត់មាត់ញក និងតាមស្រុកស្រែចំការជាដើម ។

លោក សុខា បានថ្លែងពីប្រទេសកម្ពុជាក្នុងខណៈដែលលោកកំពុងមានបេសកកម្មនៅឯខេត្តបាត់ដំបងដោយគ្មានសំចៃមាត់ថា : បច្ចុប្បន្នគណបក្សប្រជាជនកម្ពុជាកំពុងតែទទួលនូវបរាជ័យ និងទទួលរងនូវភាពអាម៉ាស់ជាច្រើនករណី ឧទាហរណ៍ដូចជាពុំមានលទ្ធិភាពគ្រប់គ្រាន់ក្នុងការការពារព្រៃឈើ,ឡូតិ៍នេសាទ និងការបណ្ដេញប្រជាពលរដ្ឋស្លូតត្រង់ចេញពីតំបន់បឹងកក់ពីសំណាក់អាជ្ញាធរសមត្ថកិច្ចដែលនៅក្រោមបញ្ជាក្រុមហ៊ុនឯកជនដ៏ធំមួយ ដែលស្និទ្ធជាមួយ ហ៊ុន សែន រហូតទាល់តែមានការកាត់ផ្ដាច់នូវប្រាក់កម្ចីជាច្រើនរយលានដុល្លារពីសំណាក់ធនាគារពិភពលោកជាដើម...។ល។

ដោយឡែកលោក សុខា បានបន្តសំពងដល់គណបក្ស សម រង្ស៊ី ដែលជាអតិតដៃគូរសម្ព័ន្ធភាពរបស់ខ្លួន ដោយបញ្ចេញឈ្មោះចំៗថា: "បច្ចុប្បន្នគណបក្ស សម រង្ស៊ី កាត់តែមានការថមថយនូវចំនួនអ្នកគាំទ្រយ៉ាងច្រើន ព្រោះដោយសារបក្សមួយនេះកំពុងតែមានវិបត្តិផ្ទៃក្នុងដែលជាហេតុនាំឱ្យគ្មានពេលវេលាគ្រប់គ្រាន់សម្រាប់ចុះតាមមូលដ្ឋានដែលសមាជិកសមាជិការបស់គណបក្ស សម រង្ស៊ី នៅតាមបណ្ដាខេត្ត-ក្រុងមួយចំនួន នឹងត្រៀមខ្លួនចូលរួមជាមួយគណបក្សសិទ្ធិមនុស្សខាងមុខនេះហើយ ។

ក្នុងកិច្ចប្រជុំតាមទូរស័ព្ទនាពេលនោះ លោក សុខា បានប្រាប់ដល់បណ្ដាអ្នកគាំទ្ររបស់ខ្លួនគ្រប់បណ្ដារដ្ឋនានាទូទាំងសហរដ្ឋអាមេរិកថា : បច្ចុប្បន្នទីក្រុងហ្វីឡាដែលហ្វៀ នៅតែជាទីក្រុងដ៏ឆ្នើម និងជាទីក្រុងគំរូមួយរបស់សាខាគណបក្សសិទ្ធិមនុស្សទូទាំងពិភពលោកតែម្ដង ព្រោះទីក្រុងនេះមានសកម្មជនគាំទ្រច្រើន និងសកម្មជាងបណ្ដារដ្ឋ ឬប្រទេសណាៗទាំងអស់ ។ ប្រធានបក្សរូបនេះបន្តថា : សកម្មជននៅហ្វីឡាដែលហ្វៀ មើលទៅហាក់មានជីវភាពពុំសូវធូរធារប៉ុន្មានឡើយ ប៉ុន្តែពួកគាត់នៅតែសកម្ម និងមិនរួញរាក្នុងការជួយជ្រោមជ្រែងដល់គណបក្សសិទ្ធិមនុស្សឡើយ ថ្នាក់ដឹកនាំសាខាគណបក្សសិទ្ធិមនុស្សប្រចាំទីក្រុងហ្វីឡាដែលហ្វៀ ប្រធានបក្សថ្មី គឺលោក វ៉ា សាម៉ុន អតីតសកម្មជនរបស់គណបក្សហ៊្វុនស៊ិនប៉ិចហាក់រីកមុខមិនតិចឡើយ ចំពោះការវិវឌ្ឍន៍ទៅមុខរបស់សាខាបក្សនៅទីក្រុងហ្វីឡាដែលហ្វៀនេះ៕

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២៦ ខែសីហា ឆ្នាំ២០១១


## អាកាសចរណ៍ជាតិនឹងចាប់ផ្តើមហោះហើររវាងខេត្តសៀមរាប និងខេត្តព្រះសីហនុ

ដោយ : SIMON MARKS

THE CAMBODIA DAILY

● មន្ត្រីមួយរូបនៅទីស្តីការគណៈរដ្ឋមន្ត្រីបានមានប្រសាសន៍កាលពីម្សិលមិញថា ក្រុមហ៊ុនអាកាសចរណ៍ Cambodia Angkor Air នឹងចាប់ផ្តើមសេវាហោះហើរជាប្រចាំរវាងខេត្តសៀមរាប និងខេត្តព្រះសីហនុត្រឹមដំណាច់ឆ្នាំនេះ ។

មិនមានជើងហោះហើរទៅកាន់ខេត្តព្រះសីហនុដែលជារមណីយដ្ឋានឆ្នេរសមុទ្រដ៏ល្អរបស់ប្រទេសកម្ពុជានោះទេ ទោះបីជាអាកាសយានដ្ឋាននៅទីនោះត្រូវបានកែលម្អឱ្យមានស្តង់ដារអន្តរជាតិកាលពីពាក់កណ្តាលឆ្នាំ២០០៩ ហើយវិស័យឯកជនក៏បានជំរុញយ៉ាងខ្លាំងឱ្យក្រុមហ៊ុន Cambodia Angkor Air នេះចាប់ផ្តើមការហោះហើរទៀងទាត់ទៅកាន់តំបន់ឆ្នេរនេះ ដើម្បីបង្កើនទេសចរណ៍ក៏ដោយ ។

លោក តឹករ៉េត សំរេច ជារដ្ឋលេខាធិការទីស្តីការគណៈរដ្ឋមន្ត្រី ដែលត្រូវបានចាត់តាំងដោយរដ្ឋាភិបាលឱ្យជួយបង្កើតអាកាសចរណ៍ជាតិនេះ បានមានប្រសាសន៍ថា Angkor Air ដែលជាការវិនិយោគរួមគ្នារវាងក្រុមហ៊ុនអាកាសចរណ៍វៀតណាម និងរដ្ឋាភិបាលនោះបានសម្រេចធ្វើការហោះហើរទៅខេត្ត

តទៅទំព័រទី២២

## សមាជិកជាន់ខ្ពស់នៃអង្គចៅក្រមចំនួន១៩រូប បានទទួលការពន្យារអាណត្តិ

ដោយ : គុច ណារ៉េន

THE CAMBODIA DAILY

យោងតាមព្រះរាជក្រឹត្យមួយបានឱ្យដឹងថា សមាជិកជាន់ខ្ពស់នៃអង្គចៅក្រមចំនួន១៩រូបរួមទាំងលោក ឌិត មុន្ទី ដែលជាប្រធានតុលាការកំពូលផងនោះ បានទទួលការពន្យារអាណត្តិដែលអនុញ្ញាតឱ្យអ្នកទាំងនោះបន្តការងារ បើទោះបីជាឈានដល់អាយុ៦០ឆ្នាំ ដែលច្បាប់តម្រូវឱ្យចូលនិវត្តន៍ក៏ដោយ ។

ព្រះរាជក្រឹត្យចុះកាលបរិច្ឆេទថ្ងៃទី២៥ ខែកក្កដា នឹងដែលឡាយព្រះហស្តលេខាដោយព្រះមហាក្សត្រ នរោត្តម សីហមុនី នេះមិនបានបញ្ជាក់ពីមូលហេតុនៃការពន្យារអាណត្តិនេះទេ ។

នៅក្នុងចំណោមអ្នកដែលត្រូវបានអនុញ្ញាតឱ្យរក្សាតំណែងរបស់ខ្លួន រួមមានចៅក្រម ឌិត មុន្ទី និងអនុប្រធានរបស់លោកនៅតុលាការកំពូលគឺលោក ឃឹម ប៉ុណ្ណ លោក ជីវ កេង ជាប្រធានសាលាដំបូងរាជធានីភ្នំពេញ លោក ថោង អុល ជាប្រធានសាលាដំបូងខេត្តពោធិ៍សាត់ លោក ខ្លូត ពេជ្រ ជាប្រធានសាលាខេត្តកំពង់ស្ពឺ និងលោក ទិត សុទ្ធី ជាប្រធានសាលាដំបូងខេត្តកំពង់ចាម ។

នេះគឺជាការពន្យារអាណត្តិម្តងទៀតសម្រាប់ចៅក្រម ឌិត មុន្ទី

តទៅទំព័រទី១៩

## National Carrier to Start Siem Reap-S'ville Flights

By Simon Marks
THE CAMBODIA DAILY

Cambodia Angkor Air will launch a regular flight service between Siem Reap and Sihanoukville by the end of the year, an official at the Council of Ministers said yesterday.

There are currently no flights to Sihanoukville, the country's premier coastal resort, even though the airport there was upgraded to international standards in mid-2009 and the private sector has pushed hard for Angkor Air to start scheduled flights to the coast to boost tourism.

Council of Ministers Secretary of State Tekreth Samrach, who was appointed by the government to help set up the national carrier, said that Angkor Air—a joint venture with Vietnam Airlines and the government—had made the decision to fly to Sihanoukville on the back of growing tourist arrivals to Cambodia.

The total number of visitors arriving by air in Cambodia increased by 13.4 percent to 1.4 million people in the first six months of the year.

"We have to start to do something, because this year the number of tourists still increase," said Mr Samrach. "Two years ago, we were not sure because of economic difficulties."

"Around November is possible. We want to have a flight as soon as possible," he said, adding that the national carrier would add an Airbus 321 to its current fleet of aircraft—one Airbus 321 and two

Continued on page 9

## *Retirement Reprieve for 19 Court Mem*

By Kuch Naren
THE CAMBODIA DAILY

Nineteen senior members of the judiciary—including Supreme Court President Dith Munty—have been granted an extension allowing them to continue work despite having reached the legal retirement age of 60, according to a Royal decree.

The decree, dated July 25, and signed by King Norodom Sihamoni, does not stipulate a reason for the extension. Among those permitted to retain their position are Judge Munty and his deputy at the Supreme Court, Khim Phonn; Phnom Penh Municipal Court President Chiv Keng; and Thong Ol, Khlaut Pich and Dith Sothy, who are presidents of the Pursat, Kompong Speu and Kompong Cham provincial courts, respectively. This is a repeat extension for Judge Munty, who turned 60 in November 2009.

A second decree also lists nine judges and prosecutors who will be retired this year. In that decree, Ith Rady is ordered to retire from his post as a judge at the Ministry of Justice but is permitted to keep his position as secretary of state.

The decree came after a July 19 Supreme Council of Magistracy meeting in which 55 municipal and provincial court judges were assigned new positions as part of a nationwide judiciary rotation plan, said Judge Pich, president of Kompong Speu Provincial Court, who turned 60 in February.

"It's lucky for me to get an extension and not have to retire, even though I am 60 years old. It will let me finish some work that I have done about 50 percent of," he said, adding that extensions are typically valid for one year.

Continued on page 22

## អ្នកស្លាប់ និងរងរបួសដោយសារស្រាសកើនដល់៣០នាក់ហើយ

ដោយ : ផល សុខភារី

THE CAMBODIA DAILY

ក្រុមមន្ត្រីខេត្តបាននិយាយកាលពីម្សិលមិញថា មនុស្សចំនួន៦នាក់បានស្លាប់ និង២៤នាក់សម្រាកព្យាបាលនៅក្នុងមន្ទីរពេទ្យ ដោយសារផឹកស្រាសពុលនៅស្រុកវាលវែង ខេត្តពោធិ៍សាត់ក្នុងរយៈពេលមួយសប្តាហ៍ចុងក្រោយនេះ ។

លោក យូ យឺននី ព្រះរាជអាជ្ញារងសាលាដំបូងខេត្តបានថ្លែងថា នគរបាលខេត្តបានចាប់ខ្លួនឈ្មោះ ម៉ុត ចំណាប់ អាយុ៤៩ឆ្នាំ ដែលតាមការសង្ស័យថា បានលក់ស្រាដែលបំពុលក្រុមអ្នកភូមិ ។ លោក យឺន នី ក៏បានមានប្រសាសន៍ផងដែរថា នគរបាលបានរកឃើញថ្នាំសម្លាប់ស្មៅមួយកញ្ចប់នៅក្នុងជនសង្ស័យ ។

លោក យឺន នី បានមានប្រសាសន៍ថា "ខ្ញុំបានទៅសួរអ្នកចែកចាយស្រាសដ៏ធំនៅវាលវែង ជាទីដែលជនសង្ស័យបានទិញស្រាសរបស់គាត់ ។ ពួកគេបាននិយាយថា

តទៅទំព័រទី១៩

## ក្រុមអ្នកភូមិមកធ្វើការតវ៉ាពីជម្លោះដីធ្លីនៅសួនសេរីភាព

ដោយ : ភោគ ដន

THE CAMBODIA DAILY

ក្រុមអ្នកភូមិចំនួនជាង៥០០នាក់ មកពីខេត្តកណ្តាល និងខេត្តកំពង់ចាម បានធ្វើការតវ៉ានៅសួនសេរីភាពនាទីក្រុងភ្នំពេញកាលពីម្សិលមិញ អំពីវិវាទដីធ្លីពីរផ្សេងគ្នាដែលធ្វើឱ្យប៉ះពាល់ដល់ពួកគាត់ ។

ប្រជាពលរដ្ឋចំនួនជាង៤០០នាក់ មកពីស្រុកចំការលើខេត្តកំពង់ចាមបានឱ្យដឹងថា ពួកគាត់ធ្វើការតវ៉ា ពីព្រោះកាលពីខែកក្កដា លោកមេឃុំបុសខ្នុរបាននិយាយថា ពួកគាត់នឹងត្រូវចាកចេញពីដីរបស់ខ្លួនដើម្បីយកដីរបស់ពួកគាត់អភិវឌ្ឍ ។

ឈ្មោះ សុន ទូច ជាអ្នកភូមិម្នាក់មកពីឃុំបុសខ្នុរបាននិយាយថា "ពួកគេនិយាយប្រាប់យើងថា ពួកគេចង់អភិវឌ្ឍដីរបស់យើងហើយថា យើងនឹងត្រូវរើទៅដីថ្មី ប៉ុន្តែយើងមិនដឹងថា តើពួកគេនឹងអភិវឌ្ឍអ្វីទេ ឬថា

តទៅទំព័រទី ១១

## Casualties From Contaminated Rice Wine Rise to 30 in Pursat

*Police found weed killer in suspect's house*

By Phal Sokpheary
THE CAMBODIA DAILY

Six people have now died and 24 have been hospitalized from drinking contaminated rice wine in Pursat province's Veal Veng district in the past week, provincial officials said yesterday.

Provincial deputy prosecutor Yo Yeu Ny said that provincial police have arrested Mot Chamnab, 49, on suspicion of selling the wine that poisoned the villagers. Mr Yeu Ny also said that police found a package of weed killer in the suspect's house.

"I went and asked the main distributor of rice wine [in Veal Veng] where [the suspect] had bought his rice wine. They said that they had sold him 15 liters," Mr Yeu Ny said. "But we know that 30 liters of wine was sold to the [poisoned] people, so at this point, it should be investigated where the other 15 liters came from."

continued on page 9

## *Two Land Dispute Protests in Freedom Park*

By Phok Dorn
THE CAMBODIA DAILY

More than 500 villagers from Kandal and Kompong Cham provinces protested in Phnom Penh's Freedom Park yesterday over two separate land disputes affecting them.

More than 400 people from Kompong Cham's Chamkar Loeu district said they were protesting because in July, their Bos Khnor commune chief said they would have to leave their land so it could be developed.

"They tell us they want to develop our land and that we will move to new land, but we don't know what they are developing or where we are moving," said Sonn Tuch, a villager from Bos Khnor.

Yous Phoem, also from Bos Khnor, said the villagers had come to Freedom Park because, "We knew that this was a place to express opinions and find justice."

Commune chief Kim Khon said yesterday that the land the villagers lived on was state land and had been given to a rubber company.

"The villagers are afraid of the authorities in their provinces," said Chan Soveth, program officer for Adhoc's monitoring section. "They have come to Freedom Park because this is their last resort. They will keep coming here until they have a solution."

In a separate dispute, 72 villagers from Kandal province protested yesterday because a former local official has been clearing 23 hectares of land where 114 families have been living since 1979.

In July 2010, Kandal Provincial Court awarded the land to Prak Savuth, former deputy governor of Kien Svay district, after a land own-

continued on page 9

## Flights...

CONTINUED FROM PAGE 8

ATR 72s—in November.

Angkor Air is primarily looking into flights between Siem Reap and Sihanoukville, but the airline has not written off the possibility of starting a connection between Sihanoukville and Phnom Penh, he said.

Vann Chan Ty, deputy financial manager at Angkor Air, declined to comment, referring all questions to the State Secretariat of Civil Aviation.

Soy Sokhan, undersecretary of state at the SSCA, confirmed that Angkor Air was on track to start flights between Siem Reap and Sihanoukville, but declined to provide details.

Earlier this month, officials from the Ministry of Tourism, Cambodia Angkor Air and Societe Concessionnaire des Aeroports, the national airport operator, held a meeting during which the airline announced its interest in starting flights to Sihanoukville, according to a participant at the meeting.

have been frustrated by the lack of urgency in bringing scheduled flights to Sihanoukville. Many believe the city will only develop into a globally recognized coastal destination once tourists start to arrive by air.

Analysts say that there is a market to support regular flights to Sihanoukville.

According to a report published in January by Frederick Thomas, an economist at the International Finance Corporation, the World Bank's private sector branch, the number of tourists visiting Siem Reap and Sihanoukville during their stay in Cambodia justifies starting regular flights between the two destinations.

The report said that of the more than 150,000 international tourists visiting Sihanoukville every year, 33.2 percent were likely to go to Siem Reap as well. It predicted the number of people flying per week between Sihanoukville and Siem Reap would range from 161 to 319, depending on the season.

"When we have regular scheduled flights out, travel agencies will make new pitches," said Luu Meng, president of the Cambodia Hotel Association, adding that an air route between Sihanoukville and Siem Reap would also open up cargo opportunities for transporting fresh seafood from Cambodia's coastline.

Currently, many of the hotels in Siem Reap import seafood from Thailand, Malaysia and Vietnam.

Mr Meng said that flights into Sihanoukville would also open markets for tourists to places like Kep and Kampot provinces, both of which are not far from Sihanoukville International Airport.

"Everyone is well prepared," he said. "They're just waiting for flights to start."

## Casualties From...

Continued from page 8

Mr Yeu Ny said that there was no other store in Veal Veng that sold rice wine in such large quantities.

Police sent samples of the deadly rice wine for testing at the provincial health bureau on Monday, but Meas Bot, deputy provincial police chief, said that no results were yet available to his investigation.

Mr Bot said that the latest casualty figures—up from 5 dead and nine hospitalized on Monday—had been confirmed with the provincial hospital.

"They were not all part of the same group," Mr Bot said. "Some people drank it on different days and have not died; they were just poisoned and are now in hospital."

Sok Sitha, deputy police chief of Veal Veng district, said all victims had experienced the same side effects from drinking the wine—vomiting, loss of vision and severe stomach pain.

Mr Sitha also said that most of the victims were not locals, but migrant workers from other provinces who had come to Veal Veng to find temporary work in local industries such as farming.

## Two Land Dispute...

Continued from page 8

ership dispute with villagers had dragged on since the early 1990s.

"We won't have any land to grow our rice in the rainy season," said Choem Sarun, a villager from Samraong Thom commune. She added that villagers had been threatened with arrest by authorities.

Local families were each offered $250 by Mr Savuth for their land, but were not given any new land to live on, villagers said.

"We want Prime Minister Hun Sen to know we want our land and we are afraid every day," Ms Sarun said.

Kandal provincial governor Heng Hiem denied police had threatened villagers involved in the dispute.

## តមកទំព័រទី ១៥ ព្រះសង្ឃត្រូវបានបណ្តេញ...

ការបណ្តេញចេញនេះគឺមកពីហេតុផលនយោបាយ ។

ព្រះតេជគុណ សាវ៉ាត បានមានសង្ឃដីកាថា "អាត្មាត្រូវបានប្រជាជននិមន្តទៅសូត្រមន្ត ។ អាត្មាពុំបានធ្វើអ្វីមួយឱ្យខូចឈ្មោះព្រះសង្ឃឡើយ" ។

នេះមិនមែនជាលើកដំបូងទេ ដែលព្រះតេជគុណ សាវ៉ាត ត្រូវបានដាក់ទោសដោយមន្ត្រីសង្ឃ ។ កាលពីដើមឆ្នាំនេះ ព្រះអង្គត្រូវបានបណ្តេញចេញមិនឱ្យគង់នៅក្នុងវត្តនៅក្នុងក្រុងភ្នំពេញ ពីព្រោះព្រះអង្គបានចូលរួមក្នុងពិធីសូត្រមន្តប្រោះព្រំគ្រួសារប្រជាជននៅបឹងកក់ ។

ព្រះអង្គបានមានសង្ឃដីកាថា "តាមពិតអាត្មាគ្រាន់តែជួយប្រជាពលរដ្ឋប៉ុណ្ណោះ ពីព្រោះព្រះសង្ឃក៏ជាពលរដ្ឋម្នាក់ដែរ" ។

លោក សុខ គឹមសេង ដែលជាក្រុមប្រឹក្សាខេត្តរបស់គណបក្ស សម រង្ស៊ី នៅក្នុងខេត្តសៀមរាប បានថ្លែងថា ការបណ្តេញចេញនេះបានរំលោភសិទ្ធិរបស់ព្រះតេជគុណ សាវ៉ាត ។ "ខ្ញុំបានឃើញរដ្ឋាភិបាលជានិច្ចកាលធ្វើដូច្នេះជាមួយប្រជាជនដែលប្រឆាំងខ្លួនពួកគេចង់បញ្ឈប់ការបញ្ចេញមតិរបស់ប្រជា-ពលរដ្ឋ" ។

លោកបានមានប្រសាសន៍ថា ព្រះតេជគុណ លួន សាវ៉ាត មិនមែនជាសមាជិករបស់គណបក្ស សម រង្ស៊ី ដូចដែលអាជ្ញាធរខ្លះបានអះអាងនោះទេ ។ "ព្រះសង្ឃផ្សេងៗទៀតនៅក្នុងប្រទេសកម្ពុជាអាចពាក់ព័ន្ធក្នុងនយោបាយ និងមានប័ណ្ណសមាជិករបស់គណបក្សប្រជាជនកម្ពុជាទៅទៀត ប៉ុន្តែព្រះតេជគុណ សាវ៉ាត គ្រាន់តែជាសង្ឃតូចតាចប៉ុណ្ណោះ ហើយបែរជាត្រូវដាក់ទោសទៅវិញ" ។

សម្តេចព្រះមហាសុមេធាធិបតី នន្ទ ង៉ែត បានមានសង្ឃដីកាកាលពីម្សិលមិញថា ព្រះអង្គមិនដឹងអំពីករណីថ្មីបំផុតនេះទេ ប៉ុន្តែព្រះអង្គដឹងអំពីការពាក់ព័ន្ធរបស់ព្រះតេជគុណ លួន សាវ៉ាត ក្នុងការតវ៉ាផ្សេងៗទៀត ។ ព្រះអង្គបានមានសង្ឃដីកាថា "ព្រះសង្ឃគ្មានសិទ្ធិពាក់ព័ន្ធជាមួយនយោបាយឬចូលរួមក្នុងសកម្មភាពក្ងដកម្ម ឬបំផ្លាញលោកដោយនាំឱ្យប្រជាពលរដ្ឋធ្លាក់ក្នុងបញ្ហានោះទេ" ៕

## តមកទំព័រទី ១៥ ជនរត់ពន្ធឈើប្រណិតត្រូវបាន...

ទៅកាន់ទីផ្សាររបស់វៀតណាម" ។

លោក ឡុង រុក្ខា ជាប្រធាននគរបាលអន្តោប្រវេសន៍ច្រកព្រះដៃនអូយ៉ាដាវបានមានប្រសាសន៍ថា រថយន្តក្រុងដឹកភ្ញៀវទេសចរណ៍មួយគ្រឿងដែលជារបស់ក្រុមហ៊ុន Horng Phat Corporation របស់វៀតណាមត្រូវបានឃាត់ឱ្យឈប់នៅច្រកផែកនេរនេះកាលពីល្ងាចថ្ងៃអង្គារ ។

លោកបានមានប្រសាសន៍ថា "រថយន្តក្រុងនេះ ផ្ទុកទេសចរវៀតណាមចំនួន១៤នាក់ ប៉ុន្តែមើលទៅហាក់ដូចជាធ្ងន់ខ្លាំងខុសប្រក្រតី" ដោយលោកបន្ថែមថា ក្រុមមន្ត្រីបានរកឃើញកំណាត់ឈើសាក់នៅខាងក្នុងកាប៊ីនក្រោមកៅអីនៃរថយន្តក្រុងនេះ ។ កាលបរិច្ឆេទសម្រាប់ឡើងតុលាការមិនទាន់កំណត់នៅឡើយទេ ៕

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន



ដោយ : ចំម យ៉ឹន

●●●ជាពិសេសព្រះអង្គបានអំពាវនាវឱ្យប្រជាពលរដ្ឋខ្មែរ ដែលស្រឡាញ់ថ្នាប់មុខលើព្រះអង្គត្រូវតែរត់ចូលព្រៃម៉ាកគីរួមកម្លាំងជាមួយកងទ័ពព្រៃយួនយៀកកុង ដែលកំពុងបញ្ចេញសកម្មភាពវាយប្រយុទ្ធយ៉ាងសាហាវឃោឃៅបំផុតទៅលើកងទ័ពជាតិខ្មែរស្នេហាជាតិក្រោមការដឹកនាំរបស់លោកសេនាប្រមុខ លន់ នល់ និងត្រង់ សិរិមតៈ ។

**ទឹកចិត្តគងធំពជាតិខ្មែរ ក្រោមបញ្ជាលោក លន នល់**

ក្រោយពេលរដ្ឋសភាបានសម្រេចដកអំណាចពីប្រមុខរដ្ឋខ្មែររួចហើយ ហើយសម្រេចធ្វើការទាមទារតវ៉ាឱ្យកងទ័ពព្រៃយួនយៀកកុងដកកងទ័ពចេញពីប្រទេសខ្មែរមកកងទ័ពព្រៃយួនបានទទួលបញ្ជាពីមេដឹកនាំយួនកុម្មុយនីស្តឱ្យវាយប្រហារទៅលើកងទ័ពជាតិខ្មែរភ្លាមដែរ ធ្វើឱ្យទឹកដីខ្មែរ និងបណ្តាខេត្តខ្មែរនៅជាប់ព្រំប្រទល់ដែនត្រូវធ្លាក់ទៅក្នុងកណ្តាប់ដៃត្រួតត្រារបស់កងទ័ពព្រៃយួនទាំងអស់ រួចហើយកៀរប្រជាពលរដ្ឋខ្មែរឱ្យចាកចេញពីភូមិស្រុកទៅនៅក្នុងព្រៃ ដើម្បីបង្ហាត់បង្រៀន និងបញ្ចូលមនោគមវិជ្ជាកុម្មុយនីស្តឱ្យរួមដៃវាយប្រយុទ្ធទៅលើកងទ័ពស្នេហាជាតិខ្មែរវិញ ហើយដណ្តើមអំណាចយកមកថ្វាយប្រមុខរដ្ឋខ្មែរពីមុននោះឱ្យបានក្នុងពេលឆាប់ៗនេះវិញ ។

ចម្បាំងនៅក្នុងស្រុកបានឆាបឆេះយ៉ាងសន្ធោសន្ធៅខ្លាំងឡើង ដោយសារអតីតប្រមុខរដ្ឋបានបញ្ឆេះឡើងសម្រាប់ឱ្យបានអំណាចព្រះអង្គមកវិញ ។

ដោយសារទឹកចិត្តស្នេហាជាតិយ៉ាងមោះមុតរបស់ជនជាតិខ្មែរទាំងប្រទេស ទើបបណ្តាលឱ្យនាំគ្នាចូលទៅរួមសាមគ្គីគ្នាចាប់កាន់អាវុធ វាយប្រយុទ្ធតបតវិញយ៉ាងអង់អាចក្លាហានបូរផ្តាច់បំផុត ដើម្បីការពារឯករាជ្យ សិទ្ធិសេរីភាព និងបូរណភាព អធិបតេយ្យភាពទឹកដីឱ្យបានគង់វង្សតទៅ ។

ប៉ុន្តែទោះបីជាកងទ័ពជាតិ និងប្រជាពលរដ្ឋស្នេហាជាតិខ្មែរទាំងអស់ បានប្រឹងប្រែងប្រយុទ្ធតស៊ូយ៉ាងខ្លាំងក្លាណាក៏ដោយ ក៏កម្លាំងកងទ័ពព្រៃទាំងខ្មែរទាំងយួន បានបង្កើនកម្លាំងគ្រប់មធ្យោបាយទាំងអស់ រួមផ្សំនឹងការថ្លែងប្រកាសលើកទឹកចិត្តពីអតីតប្រមុខរដ្ឋខ្មែរ ដែលកំពុងបញ្ចេញសកម្មភាពយ៉ាងពេញទំហឹងនៅក្រុងប៉េកាំងទាំងថ្ងៃ រហូតដល់ព្រះអង្គថ្លែងអំណរគុណដល់កងទ័ពព្រៃយួនយៀកកុងដែលបានសម្លាប់កងទ័ពជាតិខ្មែរ ក្រោមការដឹកនាំរបស់លោកនាយករដ្ឋមន្ត្រី លន់ នល់ ដែលព្រះអង្គបានចោទថា គឺជាឆ្កែបំរើដាច់ថ្លៃរបស់ចក្រពត្រអាមេរិកាំង ហើយជាជនក្បត់ជាតិបង្កឱ្យមានកើតសង្គ្រាមនៅក្នុងស្រុកខ្មែរ ។

សង្គ្រាមបានប្រយុទ្ធយ៉ាងសាហាវឃោឃៅស៊ើរស៊ីសាច់ហុតឈាមធ្វើឱ្យជីវិតកូនខ្មែរ ត្រូវបាត់បង់យ៉ាងគួរឱ្យអានោចអាធមនៅគ្រប់សមរភូមិ ពីព្រោះតែចង់ការពារប្រទេសជាតិ ឯករាជ្យជាតិ និងបូរណភាព អធិបតេយ្យភាពទឹកដី ដែលត្រូវប្រទេសយួនកុម្មុយនីស្តមានមហិច្ឆិតាលោភលន់ ចង់ពង្រីកអំណាច និងទឹកដីរបស់ខ្លួន ។

ហេតុការណ៍ទាំងអស់នេះ មានជនជាតិខ្មែរតិចណាស់ ដែលបានយល់ដឹង និងមើលឃើញពីសភាពពិតទាំងអស់នេះ ហើយមានសេចក្តីព្រួយបារម្ភសោកស្តាយនឹងការដែលត្រូវកើតមាននេះ ដោយសារតែមនុស្សកំពុងនាំគ្នាសប្បាយរីករាយខ្លាំងណាស់ នឹងការរីកចំរើនលូតលាស់យ៉ាងទាន់សម័យបំផុតនៃវិទ្យាសាស្ត្រគ្រប់វិស័យ ។ សម័យនេះវិទ្យាសាស្ត្របានជួបកែប្រែជីវភាពរបស់មនុស្ស ដូចជាការបង្កើតគ្រឿងអស្សាណូ អេឡិចត្រូនិច និងគ្រឿងបច្ចេកវិទ្យាពិសេសៗ សម្រាប់ស្រាវជ្រាវ និងកិច្ចការសំខាន់ៗនៅក្នុងគ្រប់វិស័យ ។

**ការដាក់អាវុធបញ្ចប់សង្គ្រាម**

ឥឡូវនេះ សូមក្រឡេកមកមើលព្រឹត្តិការណ៍ដែលកើតមាននៅក្នុងប្រទេសខ្មែរ នៅក្នុងអំឡុងឆ្នាំ ១៩៧០តទៅទៀត ។

សង្គ្រាមរវាងកងទ័ពជាតិខ្មែរ ក្រោមការដឹកនាំរបស់លោកសេនាប្រមុខ លន់ នល់ និងទ្រង់ សិរិមតៈ និងកងទ័ពព្រៃយួនយៀកកុង ខ្មែរក្រហម ក្រោមការជួយឧបត្ថម្ភ និងគាំទ្រពីអតីតប្រមុខរដ្ឋខ្មែរ ព្រមទាំងក្រុមប្រទេសកុម្មុយនីស្ត ចិន យួន និងកូរ៉េខាងជើង បានប្រយុទ្ធគ្នាគួរឱ្យប្រជាពលរដ្ឋខ្មែរខ្លាចរន្ធត់ញាប់ញ័រ និងត្រូវរងទុក្ខវេទនា ខ្លោចផ្សា ព្រាត់ប្រាសពីឪពុកម្តាយ ប្រពន្ធកូន ញាតិសន្តាន មិត្តភក្តិភូមិផងរបង



ជាមួយយ៉ាងច្រើនឥតគណនា បានពន្យាបន្លាយអស់រយៈពេលជាង៥ឆ្នាំ មានការខូចខាតយ៉ាងធ្ងន់ធ្ងរទាំងសងខាង និងបំផ្លាញខ្ទេចខ្ទីនូវរចនាសម្ព័ន្ធគ្រប់វិស័យ ធ្វើឱ្យប្រទេសជាតិខ្មែរ ធ្លាក់ទៅក្នុងសភាពទន់ខ្សោយ និងក្រតោកយ៉ាកលំបាកលំបិនគួរឱ្យអានោចអាធម ។

ដោយឃើញការរងទុក្ខវេទនា និងការព្រាត់ប្រាស់ការខូចខាតគ្រប់បែបយ៉ាងដូចបានរៀបរាប់ខាងលើ ទើបបណ្តាលឱ្យលោកសេនាប្រមុខ លន់ នល់ និងទ្រង់ សិរិមតៈ ព្រមទាំងសភាជាតិ និងប្រជាពលរដ្ឋខ្មែរ សម្រេចដាក់អាវុធឈប់វាយប្រហារគ្នាតទៅទៀត ដើម្បីបញ្ចប់សង្គ្រាមកុំឱ្យមានហេតុការណ៍ទាំងអស់ ដែលប៉ះពាល់ដល់សេចកញ្ចញតីរងទុក្ខវេទនាដល់ប្រជាពលរដ្ឋ និងការខូចខាតខ្ទេចខ្ទីប្រទេសតទៅទៀត ទើបលោកសេនាប្រមុខ និងទ្រង់សិរិមតៈចេញបញ្ជាដកកងទ័ពជាតិខ្មែរគ្រប់អង្គភាពត្រូវតែដាក់អាវុធចុះ

**តទៅលេខក្រោយ**

## តមកពីទំព័រទី ៤ អង់គ្រ្លូ ភ្លក់ម្ហូប សាំភ្លីខ្មែរ

អត្ថបទឱ្យអ្នកអានបានរំភើប និងរីករាយដូចបានចូលរួមភ្លក់ម្ហូបខ្មែរនៅ "សាំភ្លីខ្មែរ" ដែរ ។

ប្រហុកក្ដិនស្អុយ ពោះគោ ពោះវៀន ស្ថិតនៅកន្លែងក្រខ្វក់បំផុតនៃរូបរាងកាយសត្វ ម្ទេសរស់ជាតិហិរស្ទើរសន្លប់ គឺប្រាកដជាម្ហូបចម្លែកសម្រាប់ទូរទស្សនិកជនរាប់លាននាក់នៅសហរដ្ឋនេះ តែជាម្ហូបធម្មតាសោះសម្រាប់ពលរដ្ឋខ្មែរ ហើយ "សាំភ្លីខ្មែរ" មានទេពកោសល្យបន្ថែមធ្វើឱ្យមុខម្ហូបទាំងនោះមានរស់ជាតិឈ្ងុយឆ្ងាញ់ ស្អាត ហើយសមរម អាចដាក់ជូនសាធារណៈជនហូបបានយ៉ាងពេញចិត្ត នៅពេលដែល អង់គ្រ្លូ ជីមមើន ឧទ្ទានបន្ទាប់ពីប្រែទឹកមុខមកញញឹម បន្ទាប់ពីភ្លក់ម្ហូបរួចហើយថា "ផ្លែថ្លូរ ធ្វើបានដូចដើម អស្ចារ្យណាស់" នោះបានជម្រុញភាពអន្តរជាតិនិយមរបស់ម្ហូបខ្មែរ លូតបានយ៉ាងឆ្ងាយ គឺនៅពេលដែលរូបភាពនៅ "សាំភ្លីខ្មែរ" បានត្រូវផ្សាយនៅលើ "ត្រាវែលឆាណែល" ។

ក្នុងដំណើរទៅភ្លក់ម្ហូបចម្លែកនៅស្រុកខ្មែរ និងនៅ "សាំភ្លីខ្មែរ" របស់ អង់គ្រ្លូ បានធ្វើឱ្យគេចាប់អារម្មណ៍ថា វប្បធម៌ដ៏ចាស់ទុំរបស់ខ្មែរ ប្រាកដជាមានបន្សល់ទុកនូវមុខម្ហូបចម្លែកសម្រាប់បរទេសយ៉ាងច្រើន ឱ្យមនុស្សជំនាន់ក្រោយតែសព្វថ្ងៃនេះមានម្ចាស់ភោជនីយដ្ឋានជាច្រើនយល់ថា "ម្ហូបខ្មែរពុំអាចបំរើផ្សារសាធារណបានទេ" នៅឡើយ ។ អរគុណ "សាំភ្លីខ្មែរ" និង "ឡូសាន់" ដែលបានផ្សាយមុនគេនូវការសាកល្បង ឱ្យខ្មែរមានជំនឿលើគុណភាពម្ហូបខ្លួនឯង ៕



## តមកពីទំព័រទី ៨ ក្រុមអ្នកភូមិមកធ្វើការតវ៉ាពី...

គឺទីកន្លែងណាដែលយើងត្រូវរើទៅនោះទេ" ។

លោក យស ភីម ដែលមកពីឃុំបុសខ្នុរដែរនោះបាននិយាយថា ក្រុមអ្នកភូមិទាំងនេះបានមកកាន់សួនសេរីភាព ពីព្រោះ "យើងដឹងថា នេះជាកន្លែងមួយសម្រាប់បញ្ចេញមតិ និងរកយុត្តិធម៌" ។

លោក គីម ខុន មេឃុំបុសខ្នុរបានមានប្រសាសន៍កាលពីម្សិលមិញថា ដីដែលអ្នកភូមិរស់នៅគឺជាដីរដ្ឋ ហើយដីនេះត្រូវបានផ្ដល់ទៅឱ្យក្រុមហ៊ុនដាំកៅស៊ូមួយរួចហើយ ។

លោក ចាន់ សុវ៉េត មន្ត្រីកម្មវិធីផ្នែកឃ្លាំមើលរបស់អង្គការអាដហុកបានមានប្រសាសន៍ថា "ក្រុមអ្នកភូមិទាំងនេះមានការភ័យខ្លាចចំពោះក្រុមអាជ្ញាធរនៅក្នុងខេត្តរបស់ខ្លួន ។ ពួកគាត់បានមកសួនសេរីភាព ពីព្រោះទីនេះគឺជាជម្រើសចុងក្រោយរបស់ពួកគាត់ ។ ពួកគាត់នឹងនៅតែមកកាន់ទីនេះទៀតរហូតដល់ពួកគាត់ទទួលបានដំណោះស្រាយមួយ" ។

ក្នុងវិវាទដីធ្លីមួយផ្សេងទៀត អ្នកភូមិចំនួន៧២នាក់ដែលមកពីខេត្តកណ្ដាលបានធ្វើការតវ៉ាកាលពីម្សិលមិញ ពីព្រោះអតីតមន្ត្រីមូលដ្ឋានមួយរូបបានរានដីទំហំ២៣ហិកតា ដែលប្រជាពលរដ្ឋចំនួន១១៤គ្រួសារបានរស់នៅចាប់តាំងពីឆ្នាំ១៩៧៩មក ។

កាលពីខែកក្កដា ឆ្នាំ២០១០ សាលាដំបូងខេត្តកណ្ដាលបានសម្រេចផ្ដល់ដីនេះឱ្យលោក ប្រាក់ សារុំធ អតីតអភិបាលរងស្រុកកៀនស្វាយ បន្ទាប់ពីជម្លោះពាក់ព័ន្ធនឹងកម្មសិទ្ធិដីធ្លីជាមួយក្រុមអ្នកភូមិបានអូសបន្លាយចាប់តាំងពីដើមទសវត្សរ៍ឆ្នាំ១៩៩០មក ។

អ្នកស្រី ជឹម សារុន ជាអ្នកភូមិម្នាក់មកពីឃុំសំរោងធំបានឱ្យដឹងថា "យើងនឹងគ្មានដីដើម្បីធ្វើស្រែក្នុងរដូវវស្សានេះទេ" ។ អ្នកស្រីបានបន្តថា ក្រុមអ្នកភូមិត្រូវបានគំរាមកំហែងចាប់ខ្លួនដោយក្រុមអាជ្ញាធរ ។

ក្រុមអ្នកភូមិបានឱ្យដឹងថា គ្រួសារអ្នកភូមិនៅឃុំសំរោងធំ ក្នុងមួយគ្រួសារៗបានទទួលប្រាក់ចំនួន២៥០ដុល្លារពីលោក ប្រាក់ សារុំធ សម្រាប់ដីរបស់ពួកគាត់ ប៉ុន្តែពុំទាន់បានទទួលដីថ្មីណាមួយដើម្បីរស់នៅនៅឡើយទេ ។

អ្នកស្រី ជឹម សារុន បាននិយាយថា "យើងចង់ជម្រាបសម្ដេចនាយករដ្ឋមន្ត្រី ហ៊ុន សែន ឱ្យដឹងថា យើងចង់បានដីរបស់យើងមកវិញ ហើយយើងមានការភ័យខ្លាចជារៀងរាល់ថ្ងៃ" ។

លោក ហេង ហៀម អភិបាលខេត្តកណ្ដាលបានបដិសេធថា នគរបាលពុំបានធ្លាប់គំរាមកំហែងក្រុមអ្នកភូមិណាដែលពាក់ព័ន្ធនឹងជម្លោះដីធ្លីនោះទេ ៕

តមកពីទំព័រទី ៥

## ក្រុងខ្មែរ នៅឡូវែល និង...

ជាងតំបន់ឯទៀតៗនៃ ស.រ.អា ។

**ឡូវែល** : ក្រុងឡូវែល គឺជាក្រុងដែលមានសហគមន៍ខ្មែរច្រើនលំដាប់លេខ២ដែលមានពលរដ្ឋខ្មែរប្រមាណជា៣ម៉ឺនរស់នៅចាស់ឆ្នាំដូចគ្នានឹងក្រុងឡុងប៊ិចដែរ ។ ឥឡូវនេះសហគមន៍ខ្មែរកំពុងធ្វើការឃោសនាយ៉ាងខ្លាំងក្លា ដើម្បីបង្កើតក្រុងខ្មែរជាលើកទីពីរនៅ ស.រ.អា នេះ ។

ព័ត៌មានដែលយើងទទួលបានក្រៅផ្លូវការថា "ក្រុងខ្មែរ" នៅឡូវែលបានទទួលការសម្រេចវិជ្ជមានពីគណក្រុមប្រឹក្សាក្រុងឡូវែលរួចហើយនាពេលថ្មីៗនេះ ។ យើងនឹងតាមដានយកព័ត៌មាននេះមកជូនលោកអ្នកអានជាបន្តទៅទៀតនៅពេលក្រោយ ៕




រូបថតផ្សាយដោយសមាគមខ្មែរនៅឡូវែល

## Lowell: Restaurant &Bar for Sale

## ដំណឹងលក់ហាងជាបន្ទាន់

Full Liquor License មានឡៃស៊ិនបារ

QUICK SALE!!!! ត្រូវលក់ជាបន្ទាន់ម្ចាស់ត្រូវរើទៅរដ្ឋផ្សេង

More Information contact Mr. Huong – **978-289-7878**

សូមទាក់ទងលោក ហ៊ួង តាមទូរស័ព្ទ **978-289-7878**





SOUPER BOWL RESTAURANT
1733 Middlesex Street Lowell, MA 01851 978.937.3388
www.facebook.com/souperbowlrestaurant

## ភោជនីយដ្ឋាន ឆាយណាស្តារ

*China Star*




មានម្ហូបចិន
ម្ហូបប៉ូលីណេស៊ី
ម្ហូបចិនកង់តុង
ម្ហូបម៉ង់ដារិន

Chinese -Polynesian -Cantonese -Mandarin
369 Broadway St., Lowell, MA 01854
Tel: 978-454-7578, 978-454-7507

Open Daily: Sun. to Thurs. 11:00 AM to 1:00 AM
Fri. and Sat. 11:00 AM to 3:00 AM



យើងអាចយកម្ហូបទៅដល់ផ្ទះបាន

We Deliver All Day: 11:30 AM to 1:00 AM Available to most areas. Min. $10.00 Delivery Charge $2

**$17.99**

បង្កងឆាខ្ទឹម និងខ្ញីពិសេស

SPECIAL 2 Lobsters w/ Scallion & Ginger



## Massachusetts Council on Compulsive Gambling

*We understand the problem. We can help.*

## ក្រុមប្រឹក្សារដ្ឋម៉ាសាឈូសេតសំរាប់ ការញៀនល្បែងស៊ីសង

"ប្រសិនបើលោកអ្នក ឬនរណាម្នាក់ដែលអ្នកស្គាល់ មានបញ្ហាញៀនល្បែងស៊ីសង សូមទូរស័ព្ទមកលេខ ខាងក្រោម អាចជួយជាអ្នកសម្ងាត់ ហើយ សួររកសៀវភៅសម្រាប់ឱ្យអាចជួយខ្លួនឯងបាន ជាភាសាខ្មែរដោយឥតគិតថ្លៃ"

**1-857-383-3577**

ជំហានដំបូងរបស់អ្នកឆ្ពោះទៅកាន់ការផ្លាស់ប្តូរ

www.asianproblemgambling.org



# Vihi insurance-Income Tax Mortgage-Realty

ធានារ៉ាប់រង_គាត់លើប្រាក់ចំណូល_ខ្ចីប្រាក់ទិញផ្ទះ_ទិញលក់ផ្ទះ

**Insurance** ធានារ៉ាប់រង
(Licensed PA, NJ & DE) អាជ្ញាប័ណ្ណ PA, NJ & DE
Home • ផ្ទះ Car • រថយន្ត
Business • មុខរបរ Health • សុខភាព

**Income Tax** គាត់លើប្រាក់ចំណូល
Individual • ផ្ទាល់ខ្លួន Business • ពីមុខរបរ
Pay Roll • ពីប្រាក់ខែ
Forming New Business • បង្កើតមុខជំនួញថ្មី
Home Deed Transfer • ប្តូរឈ្មោះផ្ទះ
Auto Title Transfer • ប្តូរឈ្មោះម្ចាស់រថយន្ត




**Vihi Mortgage** Vihi ខ្ចីប្រាក់ទិញផ្ទះ
(Licensed by PA Dept. of Banking) • អាជ្ញាប័ណ្ណពី PA ការិយាល័យធានាគារ
Hiep Vo, MBA, President. • ហ៊ីប វ៉ូ MBA ប្រធាន
Finance/Refinance your home • ផ្តល់ប្រាក់កម្ចីក្នុងការទិញផ្ទះទិញដំបូង ឬកណ្តាលទី
Low interest Rate & Down Payment • ការប្រាក់ថោក និងលុយកក់តិច
Fast Preapproval • ចម្លើយលឿន

Vihi Realty Co
Dr. Hanh Vo, Broker/Owner Cell (267) 664-2689
Buy & Sell Properties & Businesses
Visit: www.drhanh.net for more foreclosure homes

North Phila – 215-276-8441
5225 N. 5th Street
Phila., Pa 19120

South Phila – 215-336-0600
1519 W. Passyunk Ave.
Phila., Pa 19145
www.vihifinancial.com



# ហាងមាសរស្មី
## SUNSHINE JEWELRY, INC.
**215-271-2950**

Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong






702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com

# Phở Hà Saigon
## Vietnamese Restaurant

**7 days A Week 9am-9pm**

B.Y.O.B.



ជាហាងដែលធ្វើ ហ្វើ ឆ្ងាញ់ជាងគេនៅហ្វីឡាដែលហ្វៀ
ចុងភៅដែលពូកែធ្វើ ហ្វើ និងម្ហូបផ្សេងៗទៀត
ត្រូវមាត់ភ្ញៀវគ្រប់ៗរូប ឥឡូវនេះមកធ្វើម្ហូបនៅហាងយើងខ្ញុំ
ហើយធានាថា ម្ហូបអាហារហាង Phở Hà Saigon
និងបំរើលោកអ្នកបានយ៉ាងពេញចិត្តគ្រប់ពេលវេលា




**320 W. Oregon Avenue, Suite 1. Philadelphia, PA 19147**
**Tel: (215) 389-1002 (Inside Oregon Market)**



ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណើចប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២៦ ខែសីហា ឆ្នាំ២០១១

## ព្រះសង្ឃត្រូវបានបណ្តេញចេញពីវត្ត ខេត្តសៀមរាប

**ដោយ : ផល សុខភារី**

THE CAMBODIA DAILY

មេគុណខេត្តសៀមរាបកាលពីថ្ងៃច័ន្ទបានបណ្តេញសកម្មជន ជាសង្ឃមួយអង្គមិនឱ្យគង់នៅក្នុងវត្តរបស់ខេត្តនេះទៀតទេ ពីព្រោះព្រះអង្គ "បានធ្វើឱ្យ" អាជ្ញាខឹង ដោយសារសូត្រមន្តប្រោះព្រំក្រុមបុរស ដែលពាក់ព័ន្ធក្នុងវិវាទដីដ៏ចម្រូងចម្រាសមួយ ។

ការដេញចេញនេះបានធ្វើឡើងមួយថ្ងៃបន្ទាប់ពីព្រះសង្ឃព្រះនាម លួន សាវ៉ាត បានប្រារព្ធពិធីនៅក្នុងវត្តមួយក្នុងឃុំជីក្រែង សម្រាប់អ្នកទោស៧នាក់ដែលថ្មីៗនេះត្រូវបានដោះលែងពីពន្ធនាគារ ។ អ្នកទោសខ្លះក្នុងចំណោមអ្នកទោសទាំងនោះត្រូវបានដាក់ពន្ធនាគារ ដោយការពាក់ព័ន្ធរបស់ពួកគេក្នុងវិវាទដីធ្លីដ៏អូសបន្លាយមួយនៅជីក្រែង ។

មេគុណខេត្ត ពិន សំ ដែលក៏ជាជំនួយការរបស់សម្តេចអគ្គមហាសង្ឃរាជាធិបតី ទេព វង្ស ដែរនោះ បានមានសង្ឃដីកាថា "អាជ្ញាធរមូលដ្ឋានខឹងខ្លាំងណាស់ចំពោះទង្វើរបស់ព្រះតេជគុណ លួន សាវ៉ាត ទើបពួកគេទូរស័ព្ទប្តឹងមកអាត្មា" ។ "សង្ឃអង្គនេះមិនគោរពច្បាប់ព្រះពុទ្ធសាសនាទេ ពីព្រោះព្រះអង្គកំពុងតែញុះញង់ឱ្យមានជម្លោះរវាងប្រជាជននិងអាជ្ញាធរ" ។

ប៉ុន្តែព្រះតេជគុណ សាវ៉ាត ដែលគេស្គាល់ច្បាស់ដោយសារការគាំទ្ររបស់ព្រះអង្គចំពោះអ្នកភូមិដែលពាក់ព័ន្ធក្នុងជម្លោះដីធ្លីនានានោះ បានមានសង្ឃដីកាថា ព្រះអង្គគិតថា **តទៅទំព័រទី ៩**

## ជនរត់ពន្ធឈើប្រណិតត្រូវបានចោទប្រកាន់ពីបទល្មើសព្រៃឈើ

**ដោយ : គុជ ណារ៉ែន**

THE CAMBODIA DAILY

យោងតាមនគរបាលអន្តោប្រវេសន៍ និងមន្ត្រីតុលាការមួយរូបបានឱ្យដឹងថា ជនជាតិវៀតណាម៤នាក់ដែលត្រូវបានចាប់ខ្លួនកាលពីថ្ងៃអង្គារ ខណៈពេលប៉ុនប៉ងរត់ពន្ធឈើប្រណិតទម្ងន់ជាង៤.០០០គីឡូក្រាមក្នុងរថយន្តក្រុងដឹកភ្ញៀវទេសចរណ៍មួយគ្រឿងឆ្លងកាត់ព្រំដែនទៅកាន់ប្រទេសវៀតណាមនោះ ត្រូវបានសាលាដំបូងខេត្តរតនគិរីចោទប្រកាន់ពីបទល្មើសព្រៃឈើកាលពីម្សិលមិញ ។

លោក រស់ សារាំ ជាព្រះរាជអាជ្ញារងអមសាលាដំបូងខេត្តនេះបានមានប្រសាសន៍ថា ជនល្មើសឈ្មោះ Kau Thi Hoeu អាយុ៣៦ឆ្នាំ ឈ្មោះ Hong Thi Eak អាយុ២៦ឆ្នាំ ឈ្មោះ Le Kau Keung អាយុ២២ឆ្នាំ និងឈ្មោះ Dau You អាយុ៣៣ឆ្នាំ ត្រូវបានចោទប្រកាន់ពីបទនាំចេញផល និងអនុផលព្រៃឈើដោយគ្មានអាជ្ញាប័ណ្ណ ជាបទល្មើសមួយដែលជនសង្ស័យទាំងនេះក្នុងម្នាក់អាចជាប់ពន្ធនាគារចន្លោះពីមួយឆ្នាំទៅ៥ឆ្នាំ និងពិន័យជាប្រាក់ប្រហែល២.៥០០ដុល្លារទៅ២៥.០០០ដុល្លារ ។

លោក រស់ សារាំ បានមានប្រសាសន៍ថា "ជនទាំង៤នាក់នេះបានអះអាងថា ពួកគេបានរត់ពន្ធឈើកាត់ជាកំណាត់ៗនេះពីប្រទេសឡាវ ដើម្បីឆ្លងដែន **តទៅទំព័រទី ១៨**

## Activist Monk Banished From S Reap Pagodas

**By Phal Sokpheary**
THE CAMBODIA DAILY

The provincial monk chief of Siem Reap on Monday banished an activist monk from living in the province's pagodas because he "annoyed" authorities by praying with men involved in a hot-button land dispute.

The banishment came a day after monk Loun Savath performed a ceremony in a pagoda in Chi Kreng commune for seven prisoners recently released from prison. Some of the prisoners had been jailed for their involvement in a long-standing land dispute in Chi Kreng.

"The local authorities were annoyed so much with [Loun Savath's] actions that they telephoned and complained to me," said provincial monk chief Pin Sam, an assistant to Great Supreme Patriarch Tep Vong.

"This monk does not respect Buddhism rules, because he is provoking a dispute between the people and authorities."

But Savath, well known for his support of villagers embroiled in land disputes, said he felt the banishment was politically motivated.

"I was invited by the people to do the blessing ceremony," Savath said. "I did not do anything out of the name of a monk."

This is not the first time Savath has been punished by the Buddhist hierarchy. Earlier this year, he was banished from living in Phnom Penh pagodas because he joined in a prayer ceremony with families at Boeng Kak lake.

"In fact, I just help people, because a monk is also a citizen," he said.

Sok Kim Seng, SRP provincial councilor in Siem Reap, said the banishment violated Savath's rights. "I have seen the government always does this with the people who oppose them—they want to stop the citizens' speech."

He said Loun Savath was not a member of the SRP, as some authorities have claimed.

"The other monks in Cambodia can be involved in politics and

*Continued on page 19*

## Lumber Smugglers Charged With Forestry Offenses

Four Vietnamese citizens, caught Tuesday attempting to smuggle more than 4,000 kg of luxury wood across the border to Vietnam inside a tourist bus, were charged with forestry offenses yesterday by Ratanakkiri Provincial Court, according to immigration police and a court official. Deputy prosecutor Ros Saram said offenders Kau Thi Hoeu, 36, Hong Thi Eak, 26, Le Kau Keung, 22, and Dau You, 33, had been charged with exporting forest products and byproducts without a license, an offense that could subject each suspect to between one and five years in prison and fines of about $2,500 to $25,000. "The four claimed they smuggled cut logs from Laos to cross the border to Vietnam's market," Mr Saram said. Long Rokha, O'Yadaw border checkpoint immigration police chief, said a tour bus owned by Vietnam's Horng Phat Corporation was stopped at the checkpoint on Tuesday evening. "The bus was loaded with 14 Vietnamese tourists, but looked irregular and heavy," Mr Rokha said, adding that officials found the logs hidden inside the bus' lower cabin. A court date has not yet been set. *(Kuch Naren)*







Welcome Everyone to Lowell's 15th Annual Southeast Asian Water Festival. On behalf of the Water Festival Committee, I would like to Thank you all for coming and supporting the Water Festival throughout the years. If it weren't for our communities coming together, this festival would not be able to happen. Enjoy the day and see you all next year!

With Our Sincere Thanks,
The Lowell Southeast Asian Water Festival Committee



## Friday 8/19/11 Schedule of Events • Moderator: Dahnie Tran

| | |
|---|---|
| 6:00 | Classical Laos Music Opening |
| 6:15 | Introduction/Opening by Molyka Tieng & Dahnie Tran |
| 6:20 | History of Water Festival by Samkhann Khoeun |
| 6:30 | Laos Dance Performance: Kuptum |
| 6:40 | Storytelling: Southeast Asian Folk Tale by Molyka Tieng |
| 6:50 | Laos Dance: Salavan |
| 7:00 | Laos Classical Music Performance |
| 7:15 | Laos Dance: Kukarpparkse |
| 7:30 | Closing Remarks by Dahnie Tran |
| 7:40 | Blessings by the Monks Wat Buddhabhavana of MA and head out to Candlelight Ceremony with Cambodian Classical Music |
| 9:00 | End of Event |



Many thanks to all of our vendors for supporting us...they help make the Lowell Southeast Asian Water Festival possible!

**Information**

- Angkor Dance Troupe
- Apsara Creations
- Asian Task Force Against Domestic Violence
- Asian Women Health Initiative Project, Boston University
- Bad Boyz Band
- BMC Health Plan
- Cambodian Church of the Nazarene
- Cambodian Evangelical Church
- CCAF Christian Cambodian American Fellowship
- Center for Hope and Healing
- Church of Jesus Christ of Latter Day Saints
- Eastern Bank
- Gateway Family Dental
- H & R Block
- Home Away From Home
- HOPE Worldwide-Boston Chapter
- Keo K'Jay
- Khamer Charity Association
- Kun Khmer
- Lowell Cambodian American Voting Project
- Lowell Community Health Center
- Lowell General Hospital
- Lowell Memorial Auditorium
- Marcotte Law Firm
- Nichiren Buddhist Sangha of Greater New England
- Senior Whole Health
- Supreme Master Ching Hai International Assoc.
- Team Pradal Serey
- Visiting Nurse Association of Greater Lowell










## Boat Teams

**Stop by the river to cheer our brave rowers of the Lowell Southeast Asian Water Festival!**

| TEAM | CAPTAIN |
|---|---|
| Angkorian Warriors | Tony Phiv |
| Indo Unity | Andy Lam |
| Khmer Krom N.E. | Thanh Thach |
| Lao NH-ME Association | Infeng Vongsay |
| LaosBodian | TK Daranikhone |
| LPS Dream Team | Marta Rosario |
| Mekong Rower | Sye Chanthaboun |
| Payanak | Tom Senephavisouk |
| River Raiders | Dennis Sheehan / Douang Phommasinh |








### Merchandise

- Amara Boutique and Services
- Angkor Hair Design
- Angor Trading, LLC
- Cambofresh Clothing
- Carradine Kem
- Chanthavy Rattana
- D.I.K. Mojo, LLC
- Gina Beauchamp
- Good Day Video
- Jadeast Inc.
- Khmer Fashion (Bopha)
- Lao Garden Arts and Crafts
- Len Lao
- Lowell City Video
- Millbury Foods
- Mirna Fashions
- Nepal Buddhist Monks
- New Kampuchea Video
- Paew Gift Shop
- Quality Resources
- Reach Angkor Gift Shop
- Safe Haven School
- Sarfia Khan
- Supha Thongtavee
- SV Oriental Market
- Thoeut Sath
- Vue Yang
- Wings of Hope Alliance for Cambodia

## Saturday 8/20/11 Stage Schedule

| | |
|---|---|
| 10:00 | Monk Blessing |
| 10:10 | Douang Introduces Boat Teams |
| 10:20 | Angkor Dance Troupe |
| 10:30 | Rap Artist: Vandaliss |
| 10.40 | Angkor Dance Troupe |
| 10:50 | Kun Khmer Federation: Martial Arts Show |
| 11:00 | Singer: Jasper |
| 11:10 | Rap Artist: JL Jupiter |
| 11:20 | Live Band: Laos |
| 11:40 | Laos Singer: Matthew |
| 11:50 | Laos Dance: Traditional |
| 12:00 | Laos Dance |
| 12:10 | Singer: Bona |
| 12:20 | Live Band: Bad Boys |
| 12:35 | Singer: AJ |
| 12:45 | Dance Contest: 1st Group |
| 12:55 | Dance Contest: 2nd Group |
| 1:05 | Rap Artist: AZI Fella |
| 1:15 | Finalists from 1st & 2nd Dance Contest |
| 1:25 | Thai Dance 1 |
| 1:35 | Thai Dance 2 |
| 1:45 | Dance Contest: 2 Finalist |
| 1:55 | Rap Artist: Sam Hy |
| 2:05 | Golden Chyld |
| 2:25 | Zumba Dance Performance/Singer |
| 2:35 | Lion Dance |
| 2:45 | Live Band: Basement |
| 3:05 | 2nd Annual Award Ceremony for Papaya Salad |
| 3:15 | Award Ceremony for Dance Contest |
| 3:25 | 15th Annual Award Ceremony for Boat Race |

The 15th year celebration of the Lowell Southeast Asian Water Festival would not have been made possible without the dedication and commitment of the following individuals:

**Board of Directors**
Molyka Tieng, President
Venerable Mangkane Dhammadharo, Treasurer
Dahvy Tran, Clerk
Van Pech
Douang Phommasinh
Eric Sack
Sayon Soeun
Ghla Srithong

**Boat Team Committee**
Douang Phommasinh – Chair
Van Pech-Vice Chair

**Entertainment Committee**
Ghla Srithong- Chair
Molyka Tieng
Dahvy Tran
MC's: Dahnie Tran, Bunsong Sol, Cornell Robinson, Sompis Cabana

**Fundraising Committee**
Molyka Tieng – Chair
Sayon Soeun
Dahvy Tran
Van Pech

**Logistics Committee**
Molyka Tieng – Chair
Cheryl Kim
Venerable Mangkane Dhammadharo
LZ Nunn
Chris Samaras
Sayon Soeun
Duey Kol

**Volunteer Committee**
Dahvy Tran – Chair
Cheryl Kim
Van Pech













នាទី ប្រវត្តិសាស្ត្រ

## ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

ប្រែសម្រួលដោយ : គីម វិមល

(តពីលេខមុន)

**៨មិនា :** ប្រទេសជប៉ុនផ្តល់នូវគោលគំនិតមួយចំនួន ដើម្បីអាចឈានទៅដល់ការចរចារគ្នាមួយ ដែលអាចជៀសពីកង្វះគំនិតក្នុងគម្រោងលើកឡើងដោយក្រុមសមាជិកអចិន្ត្រៃយ៍ P៥ ។ គេសំគាល់ជាអាថិ : ការបញ្ជាក់ជាផ្លូវការណ៍ លើកំណត់របស់លោក រ៉ាហ្វីត ឌីន អាម៉ាត់ ដែលមានកិរិតជិតបំផុតទៅនឹងការដកសព្វាវុធទាំងអស់មុនពេលបោះឆ្នោត ។

**១៦មិនា :** ភាគីខ្មែរក្រហម និងរបប២ (FNLPK) រួមកម្លាំងគ្នាទប់ប្រឆាំងការវាយមកលើស្រុកថ្មពួក ដោយភាគីរដ្ឋកម្ពុជា ។

**២៥មិនា :** ភាគីរដ្ឋកម្ពុជាធ្វើការសាកល្បង ដោយវាយប្រហារទៅលើសំបុកខ្មែរក្រហមនៅចំណុចប៉ៃលិន ដែលមានរទ្ធជីកប្រេកបរបររកមាស ពេជ្រ ហើយដែលមានជនជាតិថៃប្រមាណ៦ម៉ឺននាក់មករកស៊ី ។ ទ័ពក្រុងភ្នំពេញប្រើកម្លាំងទ័ពអាកាសបន្ថែមលើការវាយប្រយុទ្ធ ដែលមានជាច្រើនសប្តាហ៍ ។ យុទ្ធនាការត្រូវធ្លាក់ទឹក ។

**៣០មិនា :** ការបើកទំនាក់ទំនងតាមផ្លូវអាកាសរវាងបាងកក-ភ្នំពេញ ។

**៣១មិនា :** ចំនួនមនុស្សដែលបានគេចចេញពីផ្ទះសម្បែង ពីតំបន់សង្គ្រាមកើនដល់១៨ម៉ឺន៦ពាន់នាក់ ។

**៥-៨មេសា :** ទស្សនកិច្ចរបស់លោក ប្រ៊ោម និង ម៉ាកគេន ព្រឹទ្ធសភាអាមេរិក ដោយមានលោក លម ក្រែម័រ ជាអនុរដ្ឋលេខាធិការរងរដ្ឋាភិបាលអាមេរិក អមដំណើរផង ។ ការសន្ទនាគ្នាជាមួយ ជា ស៊ីម ហ៊ុន សែន ហោ ណាំហុង ។

**៨មេសា :** ប្រទេសជប៉ុន ផ្តល់ជំនួយមនុស្សធម៌ចំនួន១,៣៦លានដុល្លារ ដល់រដ្ឋកម្ពុជា ។

២០មេសា : ហ៊ុន សែន ចូលព្យាបាលនៅមន្ទីរពេទ្យនាប្រទេសជប៉ុន ។

**២២មេសា :** ប្រទេសបារាំង ឥណ្ឌូនេស៊ី និងលោកអគ្គលេខាធិការ អ.ស.ប ប្រកាសការឈប់បាញ់គ្នាចាប់ពីថ្ងៃទី១ ខែឧសភា ។

**២៦មេសា :** ក្រោយពីបានជួបរវាងលោកនាយករដ្ឋមន្ត្រីថៃ គឺលោក ប្រាទីយ៉ា រ៉ាឈុន ខ្សៅ សំផន ទ្រង់រណ្ណរិទ្ធិ និងលោក ស៊ីន សាន ទាំងអស់គ្នា គេប្រកាសទទួលយកការឈប់បាញ់គ្នា ។ លោក ហ៊ុន សែន ទទួលយល់ព្រមតាមសេចក្តីប្រកាសមួយដែរ មុនចាកចេញពីក្រុងតូក្យូ ។

**២៩មេសា :** សហរដ្ឋអាមេរិក ផ្តល់ជំនួយមនុស្សធម៌ចំនួន៧លានដុល្លារ ទៅដល់ភាគីសេរី ។

**១ឧសភា :** ដំណាក់កាលឈប់បាញ់គ្នា ។

**៣ឧសភា :** លោក ហេ្សានតែរី ព្រឹទ្ធសភា ស.រ.អា ផ្នែកទំនាក់ទំនងក្រៅប្រទេស បានមកជួបចរចារជាមួយលោក ជា ស៊ីម ។ ប្រទេសកម្ពុជា សង្ឃឹមទទួលបាន នូវការិយាល័យទំនាក់ទំនងមួយនៅភ្នំពេញ ។ ឯភាគីខ្មែរក្រហម ប្រហែលនឹងត្រូវបានស្ថិតនៅក្រៅ

(មានតនៅលេខក្រោយទៀត)





## ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១៣៨-** ព្រះបរមសាស្តាចារ្យទ្រង់ឈរសំលឹងមើលមាណពនោះរហូតដល់ចប់ប្រពៃណីដ៏ចម្លែករបស់គាត់នៅតាមដងផ្លូវធ្លារួចព្រះអង្គទ្រង់សួរមាណពថា ហេតុអ្វីបានជាគាត់ធ្វើដូច្នេះ ។ មាណពឆ្លើយថា បានជាគាត់ថ្វាយបង្គំ គឺធ្វើទៅតាមបណ្តាំរបស់ឪពុកគាត់ដែលបានផ្តាំកាលពីគាត់ហៀបនឹងស្លាប់ទៅហើយគោលបំណងនៃការប្រតិបត្តិទំនៀមទម្លាប់នេះជារៀងរាល់ព្រឹក គឺដើម្បីការពាររាល់ គ្រោះកាចចង្រៃទាំងឡាយពីទិសណាទីមួយកុំឱ្យកើតមានដល់គាត់ ។ ក្រោយពីទ្រង់បានស្តាប់ឮដូច្នេះមក. ព្រះអង្គទ្រង់ត្រាស់ថា "ជាការល្អប្រពៃពេកណាស់ដែលអ្នកចេះគោរពតាមដ៏ស្មោះអស់ពីចិត្តនូវបណ្តាំចុងក្រោយរបស់ឪពុកអ្នក! ក៏ប៉ុន្តែន័យពិតនៃបណ្តាំរបស់ឪពុកអ្នក និងពិធីទំនៀមទម្លាប់ដែលគាត់ចង់ឱ្យអ្នកគោរពប្រតិបត្តិតាមនោះ គឺប្រាកដជាមានន័យល្អជាងអ្វីដែលអ្នកយល់ឃើញ" ។

**១៣៩-** " ឪពុករបស់អ្នកប្រាប់អ្នកឱ្យថ្វាយបង្គំទិសខាងកើតហើយបាចគ្រាប់ធញ្ញជាតិ ។ អ្វីដែលគាត់ចង់និយាយនោះគឺថា អ្នកគួរថ្វាយបង្គំគោរពប្រតិបត្តិនឹងចិញ្ចឹមរក្សាជនណាដែលមានមេត្តាករុណា ឬការស្រលាញ់ចំពោះអ្នកគឺឪពុកម្តាយរបស់អ្នក ។ ការដែលគាត់ឱ្យថ្វាយបង្គំទិសខាងត្បូង, ចូរយល់ថា ឪពុកអ្នកចង់ឱ្យអ្នកដឹងថា អ្នកត្រូវគោរពយកចិត្តទុកដាក់ និងប្រតិបត្តិបំរើគ្រូរបស់អ្នកឱ្យបានល្អ ។ ការឱ្យថ្វាយបង្គំទិសខាងលិចមានន័យថា ឱ្យចេះស្រលាញ់ថ្នាក់ថ្នម និងរក្សាការពារបុត្រភរិយារបស់ខ្លួនឱ្យបានល្អ ។ ការឱ្យថ្វាយបង្គំទិសខាងជើងមានន័យថា ឱ្យចេះស្រលាញ់សន្តោសប្រណីដល់មិត្តសំលាញ់ និងញាតិសាលោហិតទាំងឡាយរបស់អ្នក ។ ការឱ្យថ្វាយបង្គំទិសខាងលើនោះ, ឪពុករបស់អ្នកចង់និយាយថា ឱ្យអ្នកគោរពប្រណិបត្តិដល់ពួកសមណ:ពួកព្រាហ្មណ៍ និងព្រះអរហន្តទាំងឡាយ" ។

**១៤០-** "ការថ្វាយបង្គំទិសខាងក្រោមមានន័យថា ធ្វើអ្វីមួយទៅអ្នកដទៃត្រូវប្រកបដោយចិត្តមេត្តា, មិនមែនតែចំពោះមនុស្សទេថែមទាំងពពួកសត្វធំតូចទាំងឡាយដោយមិនមានការប្រកាន់រើសអើងអ្វីឡើយ ។ ឪពុកអ្នកមានធម៌នេះនៅក្នុងចិត្ត, ដូច្នេះហើយបានជាគាត់ប្រាប់អ្នកឱ្យគោរពប្រតិបត្តិតាមអាការ:យ៉ាងនេះ ដើម្បីការពាររារាំងអំពើបាបអកុសលអំពីទិសផ្សេងៗកុំឱ្យកើតមានដល់អ្នកបាន" ។ បន្ទាប់មកព្រះពុទ្ធអង្គទ្រង់សំដែងធម៌ប្រោសមាណព, ដែលមានឈ្មោះថា **សុជាត** នូវអ្វីដែលបុគ្គលគួរធ្វើសំរាប់ខ្លួនឯងផង និងសំរាប់អ្នកដទៃផងដើម្បីនាំមកនូវសេចក្តីសុខចំរើន និងការរស់នៅដ៏ប្រសើរដល់ជនទាំងឡាយទាំងក្នុងពេលបច្ចុប្បន្ន និងបរលោកនាយ ។ ព្រះដ៏មានជោគទ្រង់បានបង្រៀនសុជាតនូវសិក្ខាបទដ៏អស្ចារ្យទាំង៥គឺ មិនត្រូវសំលាប់បំបាត់ជីវិតមិនត្រូវលួច មិនត្រូវប្រព្រឹត្តខុសក្នុងកាម មិនត្រូវពោលពាក្យកុហក់ និងមិនត្រូវសេពគ្រឿងញៀនគ្រឿងស្រវឹងទាំងឡាយ ។

**១៤១-** ជាចុងក្រោយបន្ទាប់តមកទៀត, ព្រះបរមគ្រូទ្រង់ប្រទានដំបូន្មានដល់គាត់ឱ្យខិតខំប្រកបរបរចិញ្ចឹមជីវិតដោយយកចិត្តទុកដាក់, ថែរក្សាឱ្យបានល្អនូវទ្រព្យសម្បត្តិដែលរកបានមក, មិនត្រូវមានមច្ឆរិយ:, ត្រូវចេះចាត់ចែងប្រើប្រាស់ទ្រព្យរបស់ខ្លួនដោយប្រពៃ, មិនមែនសំរាប់តែប្រយោជន៍ខ្លួនប៉ុណ្ណោះទេ ។ ព្រះពុទ្ធជាម្ចាស់ទ្រង់សំដែងប្រាប់ឱ្យគាត់ចេះចាត់ចែងប្រាក់ដែលរកបានមកជាបួនចំណែកគឺ: មួយផ្នែកប្រើសំរាប់ចិញ្ចឹមគ្រួសារ, មួយផ្នែកសំរាប់ជាទុនរកស៊ី, មួយផ្នែកទៀតសំរាប់ជួយសង្គ្រោះជនក្រីក្រលំបាកទុគ៌តក្នុងសង្គម, ហើយចំណែកដែលនៅសល់ចុងក្រោយ ត្រូវសន្សំទុកសំរាប់ពេលមានគ្រោះអាសន្នយប់ថ្ងៃណាមួយ ។ សុជាត ស្តាប់ពាក្យប្រៀនប្រដៅរបស់ព្រះពុទ្ធជាម្ចាស់ដោយគោរព ហើយក៏ក្រាបបង្គំទូលសុំឱ្យព្រះអង្គទទួលយកគាត់ធ្វើជាសាវ័កមួយរូប ។ ពេញមួយជីវិតរបស់គាត់ គាត់គោរពប្រតិបត្តិទិសទាំង៦តាមដែលព្រះអង្គបានបង្រៀន ។

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

*(Continued to After Issue)*



**138-** The Buddha watched the youth finishing his strange ritual in the thoroughfare and asked him why he did all these things. The youth replied that he observed according to the directions that his father had given him when he died and that the purpose of performing this ritual every morning was to prevent an evil thing from befalling him from any directons. After hearing the answer, the Buddha said to the youth: "It is very good that you can honestly follow your father´s last instruction! But the real meaning of your father´s instructions and the ritual he wished you to observe is quite different from what you think."



**139-** "Your father told you to salute the east and spread grain. What he really meant was that you should respect and support those who have shown kindness or any kind of favor to you- that is, your parents. By saluting the south, you should understand that your father wanted you to be aware that you should respect and treat your teachers well. Saluting the west means loving and protecting your wife and children. Saluting the north means honoring your friends and relatives. By your saluting the heavens above, your father meants that you should pay reverence to Sramanas, Bramanas and saints."



**140-** "To salute the earth below means treating others kindly, not only peole, but also animals and the lowest creatures alike, without discrimninatlon. Your father had all this in mind, so he told you to salute in this manner in order to prevent evil from falling upon you from any direction whatsoever." The Buddha then expounded to the youth, whose name was **Sujata**, what one should do for himself and others in order to bring happiness and a better life to everybody now and in the future. The Buddha also instructed **Sujata** not to kill, not to utter false speech, and not to partake of any intoxicant-that is, he gave him the well-known five precepts.

**141-** Afterwards the Buddha advised him to work and earn his living diligently, to take good care of the wealth he would amass, and at the same time, to avoid being avaricious and to use his wealth properly, not only for his own benefit. The Buddha instructed him to divide his money into four portions: one part should be used for the support of his family; one part for the expansion of his business; one part to help the poor and needy people of society; nad the remaining part should be saved for any emergency. Sujata listened reverntly to the Buddha´s instruction and later requested the Buddha to accept him as a disciple. For the rest of his life he saluted the six directions in the manner and with the understanding that the Buddha had taught him.

## តមកពីទំព័រទី ៨ សមាជិកជាន់ខ្ពស់នៃអង្គចៅក្រម...

ដែលតាមសេចក្ដីរាយការណ៍ថា បានឈានចូលវ័យ ៦០ឆ្នាំ កាលពីខែវិច្ឆិកាឆ្នាំ២០០៩។

ក្រឹត្យទី២ក៏មានរាយនាមចៅក្រម និងព្រះរាជអាជ្ញាចំនួន៩រូប ដែលនឹងត្រូវចូលនិវត្តន៍ក្នុងឆ្នាំនេះផងដែរ ។ នៅក្នុងក្រឹត្យនោះ លោក អ៊ិត រ៉ាឌី ត្រូវបានបង្គាប់ឱ្យចូលនិវត្តន៍ពីតំណែងជាចៅក្រមនាក្នុងក្រសួងយុត្តិធម៌ ប៉ុន្តែត្រូវបានអនុញ្ញាតឱ្យរក្សាតំណែងរបស់លោកជារដ្ឋលេខាធិការដដែល ។

ក្រឹត្យនេះបានចេញបន្ទាប់ពីមានកិច្ចប្រជុំរបស់ឧត្តមប្រឹក្សានៃអង្គចៅក្រមកាលពីថ្ងៃទី១៩ ខែកក្កដា ដែលនៅពេលនោះ ចៅក្រមសាលាដំបូងរាជធានីភ្នំពេញ និងខេត្តចំនួន៥៥រូប ត្រូវបានផ្ដល់តួនាទីថ្មីជាផ្នែកនៃផែនការផ្លាស់វេនចៅក្រមទូទាំងប្រទេស នេះបើតាមប្រសាសន៍របស់ចៅក្រម ខ្លួត ពេជ្រ ប្រធានសាលាដំបូងខេត្តកំពង់ស្ពឺ ដែលបានឈានដល់វ័យ៦០ឆ្នាំ កាលពីខែកុម្ភៈ ។

លោកបានមានប្រសាសន៍ថា "ខ្ញុំមានសំណាងណាស់ដែលបានទទួលការពន្យារអាណត្តិ ហើយមិនចាំបាច់ចូលនិវត្តន៍ បើទោះជាខ្ញុំឈានចូលដល់វ័យ៦០ឆ្នាំហើយក៏ដោយ ។ ការបន្តនេះនឹង អនុញ្ញាតឱ្យខ្ញុំបញ្ចប់ការងារខ្លះដែលខ្ញុំទើបតែធ្វើបានប្រហែល៥០ភាគរយ" ។ ចៅក្រម ខ្លួត ពេជ្រ បានបន្ថែមថា តាមធម្មតាការពន្យារនេះមានសុពលភាពមួយឆ្នាំ ។

នៅពេលដែលត្រូវបានសួរថា ហេតុអ្វីបានជាចៅក្រម និងព្រះរាជអាជ្ញាមួយចំនួនដែលឈានដល់អាយុចូលនិវត្តន៍ទៅហើយត្រូវបានបង្ខំឱ្យចូលនិវត្តន៍ខណៈដែលចៅក្រម និងព្រះរាជអាជ្ញាដទៃទៀតត្រូវបានអនុញ្ញាតឱ្យបន្តការងារនោះ ចៅក្រម ខ្លួត ពេជ្រ បានបដិសេធមិននិយាយលម្អិតទេ ប៉ុន្តែបានមានប្រសាសន៍ថា ការពន្យារអាណត្តិនេះគឺផ្អែកទៅលើសមត្ថភាព និងសុខភាពរាងកាយ ។

នៅក្នុងចំណោមអ្នកដែលត្រូវបានបង្ខំឱ្យចូលនិវត្តន៍ឆ្នាំនេះគឺចៅក្រម ថោ សារ៉ន អតីតអនុប្រធានសាលាដំបូងខេត្តរតនគិរី ។ លោក ថោ សារ៉ន មានការខ្វែងគំនិតគ្នាយ៉ាងខ្លាំងរយៈពេលប៉ុន្មានឆ្នាំថ្មីៗនេះជាមួយក្រុមអង្គការសិទ្ធិមនុស្ស និងក្រុមអ្នកភូមិដែលបានអះអាងថា លោកបានគំរាមចាប់អ្នកតវ៉ាជម្លោះដីធ្លីដាក់ពន្ធនាគារម្ដងហើយម្ដងទៀត ។

យោងតាមលោក លូ ស៊ូសម្បត្តិ ជាប្រធានសាលាដំបូងខេត្តបានឱ្យដឹងថា ការចូលនិវត្តន៍របស់លោក ថោ សារ៉ន គឺដោយសារតែលោកឈានចូលដល់វ័យ៦០ឆ្នាំហើយ ៕

## តមកពីទំព័រទី ៨ អ្នកស្លាប់ និងរងរបួសដោយសារ...

បានលក់ស្រាស១៥លីត្រឱ្យគាត់ ។ ប៉ុន្តែយើងដឹងថា ស្រា៣០លីត្រ ត្រូវបានលក់ទៅឱ្យអ្នកដែលពុលទាំងនោះ ដូច្នេះត្រង់ចំណុចនេះត្រូវធ្វើការស៊ើបអង្កេតថា តើស្រា១៥លីត្រទៀតបានមកពីណា" ។

លោក យឹន នី បានថ្លែងថា គ្មានដេប៉ូលក់ស្រាណាទៀតនៅវាលវែង ដែលលក់ស្រាសក្នុងបរិមាណច្រើនបែបនេះទេ ។

នគរបាលបានបញ្ជូនសំណាកនៃស្រាសដែលបណ្ដាលឱ្យមនុស្សស្លាប់នេះដើម្បីធ្វើតេស្តនៅមន្ទីរសុខាភិបាលខេត្តកាលពីថ្ងៃច័ន្ទ ប៉ុន្តែលោក មាស បុត្រ ស្នងការរងនគរបាលខេត្តបានថ្លែងថា មិនទាន់មានលទ្ធផលនៃការធ្វើតេស្តសម្រាប់ការស៊ើបអង្កេតរបស់លោកនៅឡើយទេ ។

លោក មាស បុត្រ បានមានប្រសាសន៍ថា តួលេខថ្មីបំផុតនៃអ្នកស្លាប់ដែលកើនពីចំនួន៥នាក់ និង៩នាក់ ដែលទទួលការព្យាបាលនៅមន្ទីរពេទ្យកាលពីថ្ងៃច័ន្ទនោះ ត្រូវបានបញ្ជាក់ដោយមន្ទីរពេទ្យហើយ ។ លោក មាស បុត្រ បានថ្លែងថា "ពួកគេមិនមែនជាក្រុមតែមួយនោះទេ" ។

លោកបានថ្លែងថា "អ្នកខ្លះផឹកស្រានេះនៅថ្ងៃផ្សេងគ្នាតែមិនស្លាប់ទេ ពួកគេគ្រាន់តែពុលប៉ុណ្ណោះ ហើយពេលនេះកំពុងតែសម្រាកព្យាបាលនៅក្នុងមន្ទីរពេទ្យ" ។

លោក សុខ ស៊ីថា អធិការរងនគរបាលស្រុកវាលវែងបានមានប្រសាសន៍ថា ជនរងគ្រោះទាំងអស់បានទទួលផលប៉ះពាល់ដូចគ្នាពីការផឹកស្រានេះដោយក្អួតចង្អោរ ងងឹតភ្នែក និងឈឺពោះធ្ងន់ធ្ងរ ។ លោក ស៊ីថា ក៏បានថ្លែងផងដែរថា ជនរងគ្រោះភាគច្រើនមិនមែនជាអ្នកស្រុកនោះទេ ប៉ុន្តែជាកម្មករចំណាកស្រុកមកពីខេត្តដទៃទៀត ដែលបានទៅស្រុកវាល វែងដើម្បីស្វែងរកការងារធ្វើជាបណ្ដោះអាសន្ននៅក្នុងមូលដ្ឋាន ដូចជាការងារកសិកម្មជាដើម ៕

## Activist Monk Banished From S Reap ...

*Continued from page 8*

have a member card for the CPP. But monk Savath is just a small monk, and yet he is punished."

Supreme Patriarch Non Nget said yesterday that he was unfamiliar with the most recent case, but was aware of Loun Savath from his involvement in other protests.

"A monk has no right to involve himself with politics or participate in strike action or destroy the world by bringing people into ouble," he said.

# អាថ៌កំបាំង និងសិល្បៈនៃជីវិត

# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ

លោក ម៉ៅ ច័ន្ទសំណុំ

និងត្រូវការទទួលការណែនាំពីគ្រូជំនាញទៀតផង។ ដោយបច្ចេកទេសនេះជាវិធីផ្លាស់ប្តូរទម្លាប់ចាស់ ខាងក្នុងផ្ទៃចិត្តមនុស្ស ហើយបណ្តុះទម្លាប់ថ្មីៗ ។ លុះក្រោយពីហាត់នៅមជ្ឈមណ្ឌល ហើយអ្នកហាត់រៀនអនុវត្តខ្លួនឯងបន្តជារៀងរហូតទៅ ។ ការចូលរួមហាត់អង្គុយសមាធិជាសមូហភាព អាចជាវិធីជំរុញលើកទឹកចិត្តដល់អ្នកចាប់ផ្តើមដំបូង ។ បើហាត់អង្គុយបានរយៈ១ ឬ២ឆ្នាំហើយនោះ ការប្រតិបត្តិកាន់តែងាយស្រួលឡើងកាន់តែចូលចិត្តឡើង ។ វិធីនេះនឹងប្រែទៅជាចលនា និងរបត់ចាំបាច់សំរាប់ជីវភាពប្រចាំថ្ងៃរបស់យើងម្នាក់ៗប្រៀបដូចជាការដុសធ្មេញរាល់ព្រឹកដូច្នោះឯង ។

### ២១-ការបន្តហាត់រៀននៅផ្ទះ

គួរមានរៀបកន្លែងសំរាប់ហាត់អង្គុយប្រចាំថ្ងៃ ពីព្រោះកន្លែងដែលអ្នកអង្គុយរាល់ថ្ងៃអាចបង្កើតធម្មធាតុ ឬបរិយាកាស ឬ Vibration នាំឱ្យការហាត់អង្គុយសមាធិកាន់តែងាយស្រួល និងឈានឡើងយ៉ាងប្រពៃ ។ ចំពោះពេលម៉ោង គួរកំណត់ឱ្យទៀងទាត់ ។ ជាទូទៅមួយថ្ងៃពីរពេល ព្រឹក.ល្ងាច ម្តង១សុីរយៈពេលមួយម៉ោង។

សំលៀកបំពាក់ធម្មតាសំខាន់ឱ្យធូររលុងចៀសវាងភាពរឹបចង្អៀតនាំមកនូវការរំខានដល់ការអង្គុយសមាធិ ។

របៀបអង្គុយគួរអង្គុយឱ្យត្រង់ខ្លួនពុំទ្រេតទៅមុខទៅក្រោយ ឬចំហៀងពុំប្រឹងផ្អឹតខុសប្លែកធម្មតាឡើយ ។ បង្គុយមានសភាពតាមសំរួល (Comfor table) រំភើយ ។ ការមានបង្គុយត្រឹមត្រូវជាលក្ខខ័ណ្ឌសំរាប់ធ្វើឱ្យការងារសមាធិមានដំណើរជឿនលឿនទៅមុខ ពីព្រោះអង្គុយបានត្រឹមត្រូវមានន័យថា បើកផ្លូវឱ្យចរន្តថាមពលរស់ VITAL ENERGY OR PRANA មានលំហូរយ៉ាងរលូនពុំមានគាំង ឬស្ទះត្រង់ណាមួយ ។ ឧទាហរណ៍បើអ្នកអង្គុយអោនទៅមុខទ្រូងនឹងត្បៀតធ្វើឱ្យស្ទះខ្យល់ដកដង្ហើម ។ អ្នកអាចអង្គុយពែនភ្នែនរាបផ្ទាល់ក្តារ ឬលើកៅអីតាមដំណើរសមគួរនៃរូបកាយយើងម្នាក់ៗ។

### ២២- ការអង្គុយជាក់ស្តែង តើធ្វើដូចម្តេច ?

ខ្ញុំពុំអធិប្បាយលំអិតនៅក្នុងអត្ថបទនេះទេ ទុកឱ្យលោកអ្នកអញ្ជើញទៅទទួលការណែនាំ ដោយផ្ទាល់ពីគ្រូជំនាញដែលអាចជួយលោកអ្នកសមស្របនឹងស្ថានភាពជាក់ស្តែងនៃមនុស្សយើងម្នាក់ៗ។

### គ- បញ្ញា

ខ្ញុំបានរៀបរាប់លំអិតនូវជំពូកសីល និងសមាធិហើយ ។ ចំណុចមួយចុងក្រោយក្នុងប្រព័ន្ធព្រះពុទ្ធសាសនា គឺបញ្ញា ។ តើបញ្ញាក្នុងព្រះពុទ្ធសាសនាមានន័យយ៉ាងណា ? ខ្ញុំសូមកត់សំគាល់តាមចំណុចដូចខាងក្រោម :

**ទី១**,គោលដៅនៃព្រះពុទ្ធសាសនា គឺបានដល់ការរំដោះចិត្តមនុស្សពីទុក្ខវេទនាសព្វយ៉ាង ដូចជាការព្រួយបារម្ភ ទុក្ខក្រៀមក្រំ ភ័យភាពចលាចលក្នុងចិត្តតណ្ហា ការលោភលន់ ញៀន ។ល។ ព្រះពុទ្ធមានវិធីជាច្រើន ដើម្បីសំរេចការរំដោះនេះ ។ ដូចអ្នកជ្រាបមកស្រាប់ វិធីមានដូចជា ការកាន់សីល ការប្រតិបត្តិសមាធិ និងបញ្ញានេះ ។ ក្រោយពីបានអនុវត្តសីល និងសមាធិហើយអ្នកនឹងទទួលចំណេះដឹងមួយចំនួន ដូចជា : **ក**, សារៈសំខាន់នៃសតិក្នុងខ្លួនមនុស្ស Awareness **ខ**, ទស្សនៈថ្មីអំពីការទទួលយកការសុខចិត្ត Acceptance **គ**, ការមើលឃើញថា ខ្លួនខ្ញុំពុំមែនជាចិត្តនេះ ពុំមែនជាចលនាគំនិតដែលមានលំហូរតៗគ្នាមកពុំមែនជាការរំជួលចិត្តនានា ។ កំហឹងច្រណែនប្រច័ណ្ឌ ។ល។ ដូច្នេះខ្ញុំចេះពិនិត្យ និងផ្តាច់សតិពីចលនាពិភពផ្លូវចិត្តទាំងអស់នោះ ខ្ញុំមានយន្តការ និងមធ្យោបាយរំដោះពីក្នុងមក Non identification **ឃ**, ខ្ញុំមានឧបករណ៍រំដោះចិត្តតាមការពិនិត្យស្រាវជ្រាវកាយ និងចិត្តជាបន្តបន្ទាប់ Investigation ។

**ទី២**, មនុស្សទូទៅច្រើនគិតឃើញថា ចំណេះដឹងនិងប្រាជ្ញាមនុស្សកើតមកពីការសន្សំរៀនសូត្រពីពិភពខាងក្រៅ ដូចជា ការរៀនសូត្រពីសាលា ពីគ្រូ ពីសង្គមគ្រួសារ ពីការអាន ។ល។ ព្រះពុទ្ធទូន្មានថា ចូរកុំជឿលើសៀវភៅពាក្យគេថា ចូរជឿលើការពិសោធន៍ផ្ទាល់ខ្លួន ។ តើមានន័យដូចម្តេច ?

សូមពិនិត្យជាមួយខ្ញុំនូវពិសោធតូចៗដូចតទៅ :

**(ក)** បើគេសួរថា អ្វីទៅដែលហៅថាផ្លែប៉ោម ? អ្នកស្រាវជ្រាវពីសៀវភៅពីមតិយោបល់មនុស្សជុំវិញជាច្រើនយ៉ាងណា ក៏ពុំស្មើនឹងការភ្លក្សផ្ទាល់ខ្លួនម្តង ។ ការភ្លក្សផ្ទាល់នេះពន្យល់អ្នកសព្វគ្រប់អំពីជាតិផ្លែប៉ោម ពណ៌ក្រាប់ ។ សៀវភៅប៉ុន្មានក៏ពុំស្មើនឹងការភ្លក្សផ្ទាល់ខ្លួននេះដែរ ។

**(ខ)** បើអ្នកចង់ទៅទីណាមួយដែលមិនស្គាល់ ហើយអ្នកបើកផែនទីពិនិត្យណែនាំផ្លូវ ឬអ្នកសួរអ្នកជិតខាងរកទិសដៅ ។ ប្រការនេះវាជួយអ្នកឱ្យយល់ដឹងបានមួយក៏រិតប៉ុណ្ណោះ ប៉ុន្តែអ្នកនៅតែសង្ស័យជាប់ជានិច្ចពុំអស់ពុំហើយ ។ លុះអ្នកសាកល្បងចុះស្រាវជ្រាវផ្ទាល់ដល់ទីកន្លែងនោះអ្នកនឹងពិតជាអស់សង្ស័យយល់ដឹងប្រាកដប្រជាពុំខានឡើយ ។ នេះជាប្រាជ្ញាដែលព្រះពុទ្ធណែនាំឱ្យយើងប្រកាន់យក ។

**(គ)** ជនជាតិអាមេរិកាំងម្នាក់ឈ្មោះ John បានចូលជួបសម្តេចសង្ឃ ដាឡៃឡាម៉ា ហើយបានត្រូវអនុញ្ញាតិឱ្យចូលរួមហូបអាហារជាមួយព្រះអង្គ ។ ព្រះអង្គបានណែនាំ John ឱ្យធ្វើតាម ដូចតទៅ : ទី១ ចូរអ្នកកុំគិតអ្វីទាំងអស់នៅពេលហូបអាហារនេះ ។ ចូរព្យួររឿងរ៉ាវផ្សេងៗ ដែលលេចឡើងក្នុងខួរក្បាលមួយអន្លើសិនកុំឱ្យវាចូលមកជ្រៀតជ្រែកក្នុងការហូបនេះ ។ **ទី២** ចូរប្រមូលអារម្មណ៍ផ្តោតតែទៅលើសកម្មភាព (ហូបអាហារ) តែមួយគត់ ពោលគឺវិញ្ញាណទាំង៥ ដើរទៅទិសតែមួយឱការហូបអាហារនេះឱ្យច្រមុះដឹងក្លិនអាហារ

តទៅលេខក្រោយ

# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ

**ឆ្នាំជូត**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ី ជួញដូរ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ៕

**ឆ្នាំឆ្លូវ**
រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នា ទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំខាល**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ដោយចង់មានចង់បានឲ្យហួសប្រមាណពេកទេ ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានសុភ-មង្គលល្អណាស់នៅក្នុងគ្រួសារ ៕

**ឆ្នាំថោះ**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះបើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ជាថ់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែង ក្រែងមានអ្នកក្រៅមកញុះញង់ ៕

**ឆ្នាំរោង**
រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះបីជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វើប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករ អ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់នូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី៕

**ឆ្នាំម្សាញ់**
រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ និងថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបានច្រើនត្រឡប់ចូលផ្ទះ ៕

**ឆ្នាំមមី**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមការប៉ងប្រាថ្នាទាំងអស់តែលែលកយ៉ាងណា ចូរកុំជាប់ទុកចិត្តអ្នកណាម្នាក់ឲ្យសោះ ទោះជាញាតិមិត្តក្តីប្រយ័ត្នចាញ់បោកគេ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ។

**ឆ្នាំមមែ**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែលប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ធ្លាក់ពីទីខ្ពស់នាំឲ្យរងរបួសធ្ងន់ស្រាល ហើយអាចឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនត្រូវជាប់ត្រចៀកទន់ជឿសម្តីញុះញង់របស់អ្នកដទៃឡើយ ទើបបានសុខសប្បាយចិត្ត ៕

**ឆ្នាំវក**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ក្តីថ្លាគំនិតប្រាជ្ញាឈ្លាសវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ី និងជាប់និយាយត្រូវរ៉ូវ និងមានការចុះសម្រុងនឹងគ្នា ។ ចំពោះអាជីវករមានមានទំនិញលក់ចេញទិញចូលឥតទំនេរដៃព្រមទាំងមានភោគផលកម្រៃហូរចូលច្រើនទៀតផង ៕

**ឆ្នាំរកា**
រាសីលោកអ្នកល្អធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក គឺបានត្រឹមតែចំណាយកម្លាំង និងពេលវេលាឥតអំពើតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញឹក បើរលឹកកុំទៅញយ ទើបចំណងស្នេហ៍អាចគង់វង្សបានយូរអង្វែង ៕

**ឆ្នាំច**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺនៅពេលទូទាត់បញ្ជីប្រាក់កាសផ្សេងៗ ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន និងអាចកើតមានរឿងក្តីក្តាំទៀតផង ។ ចំពោះអាជីវករអ្នករកស៊ីប្តូរប្រាក់ ឬលក់គ្រឿងអលង្ការផ្សេងៗ ចូរមានការប្រយ័ត្នប្រយែងក្រែងមានជន ខិលខូចលួចបន្លំក្លែកស្រស់ៗ ៕

**ឆ្នាំកុរ**
រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិតមេដៃលើលិខិតស្នាមផ្សេងៗ ចូរពិនិត្យល្អិតល្អន់ប្រយ័ត្នបង់ខាតទ្រព្យ ច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមក ទើបទទួលបានសេចក្តីសុខ ៕

សោភ័ណភាព

## បំបាត់កំណកពណ៌លឿងពីរ៉ូលអន

●●សម្រាប់អ្នកនិយមប្រើផលិតផលរ៉ូលអន ដើម្បីបំបាត់ក្លិនកាយនោះ ប្រហែលជាចៀសមិនផុតពីបញ្ហាមានកំណកពណ៌លឿងជាប់នៅលើសំលៀកបំពាក់មិនខាន ។ តែពេលនេះយើងមានវិធីងាយៗមកណែនាំដូចខាងក្រោមនេះ :

អ្នកមិនគួរលាបរ៉ូលអនក្រោយពេលពាក់អាវហើយនោះទេ ព្រោះខណៈនោះរ៉ូលអនអាចនឹងប៉ះពាល់ជាមួយអាវធ្វើឲ្យងាយប្រឡាក់បំផុត ។ មានវិធីតែមួយគត់ គឺគួរលាបរ៉ូលអននៅមុនពេលពាក់អាវ ។ ក្រៅពីនេះមិនគួរលាបជោកពេក និងគួររង់ចាំឲ្យរ៉ូលអនស្ងួតសិនចាំពាក់អាវ ព្រោះប្រសិនបើពាក់អាវខណៈពេលរ៉ូលអននៅសើមនោះអាវនឹងប្រឡាក់រ៉ូលអនភ្លាម ៕

## ទទួលទានសណ្តែកបណ្តុះឆៅច្រើនមិនល្អ

●មានមនុស្សច្រើនណាស់ដែលនិយមទទួលទានសណ្តែកបណ្តុះនៅឆៅ ព្រោះដោយសារមានអារម្មណ៍ថាស្រួយឆ្ងាញ់ ។ ក៏ប៉ុន្តែអ្នកមានដឹងទេថា នៅក្នុងបន្លែសណ្តែកបណ្តុះឆៅ សម្បូរទៅដោយសារជាតិពុលម្យ៉ាងឈ្មោះ ហ្វីតាត ដែលមានលក្ខណៈដូចជាអេប៉ុង ។

សារជាតិពុលហ្វីតាតនេះ វានឹងស្រូបយក កាល់ស្យូម ដែកស័ង្កសី និងហ្សហ្វីស ដែលសុទ្ធសឹងសារជាតិមានប្រយោជន៍សម្រាប់រាងកាយ ។ ដូច្នេះប្រសិនបើយើងទទួលទានសណ្តែកបណ្តុះឆៅច្រើនពេក អាចធ្វើឲ្យយើងខ្វះសារជាតិខាងលើនេះបាន តែបើយកវាទៅចម្អិនមុនទទួលទាននោះ សារជាតិពុលហ្វីតាកនឹងថយចុះផ្តល់ឲ្យនូវសុវត្ថិភាពដល់រាងកាយ ៕

## ចៀនស៊ុតបែបណាឲ្យឡើងក្រពុំល្អ

●គួរជ្រើសរើសស៊ុតដែលក្លាស្សេក្នុងទូទឹកកក ដោយយកវាចេញមកក្រៅសំដិលទុករហូតដល់សីតុ-ណ្ហភាពធម្មតា ។ បន្ទាប់មកជ្រើសរើសប្រើកូនឆ្នាំងតូចល្មមសម្រាប់ចៀន ព្រោះឆ្នាំងវាជួយឲ្យស៊ុតចៀន-របស់អ្នកឡើងល្អខុសពីការប្រើខ្ទះចៀន ។ យកស៊ុតដែលត្រូវការចៀនវាយឲ្យបែក រួចលាយគ្រឿងបន្តវាយរហូតដល់គ្រឿងចូលសព្វល្អ ។ គួរចងចាំទុកថា ស៊ុតវាយហើយត្រូវដាក់ចៀនភ្លាមៗ ព្រោះបើទុកយូរពេកស៊ុតអ្នកនឹងមិនឡើងល្អនោះទេ ។ ដូច្នេះចាំន់ស្មានពេលវេលាដាក់ឆ្នាំង និងប្រេងឆា ធ្វើយ៉ាងណាឲ្យក្តៅទាន់ប្រើការ ៕

## តមកពីទំព័រទី ៨ អាកាសចរណ៍ជាតិនឹងចាប់ផ្ដើម...

ព្រះសីហនុ ដោយសារចំនួនភ្ញៀវទេសចរណ៍នៅកម្ពុជា។

ចំនួនភ្ញៀវទេសចរសរុបដែលចូលមកតាមផ្លូវអាកាសនៅកម្ពុជាបានកើនឡើង១៣.៤ភាគរយដល់ ១.៤លាននាក់ក្នុងឆមាសទី១នៃឆ្នាំនេះ។

លោក សំរេច បានមានប្រសាសន៍ថា "យើងត្រូវចាប់ផ្ដើមធ្វើអ្វីមួយហើយ ពីព្រោះនៅឆ្នាំនេះចំនួនភ្ញៀវទេសចរនៅតែកើនឡើង ។ កាលពី២ឆ្នាំមុនយើងមិនសូវប្រាកដដោយសារស្ថានភាពលំបាកផ្នែកសេដ្ឋកិច្ច"។

លោកបានមានប្រសាសន៍ថា "ប្រហែលជានៅខែវិច្ឆិកា អាចដំណើរការបានហើយ ។ យើងចង់ឱ្យមានការហោះហើរឆាប់ៗតាមដែលអាចធ្វើទៅបាន"។ លោកបានបន្ថែមថា អាកាសចរណ៍ជាតិនេះនឹងបន្ថែមយន្តហោះធុន Airbus 321 ទៅក្នុងចំនួនយន្តហោះបច្ចុប្បន្នរបស់ខ្លួន គឺយន្តហោះធុន Airbus 321 មួយគ្រឿង និងធុន ATR 72 ពីរគ្រឿងនៅខែវិច្ឆិកាខាងមុខនេះ។

លោកបានមានប្រសាសន៍ថា ក្រុមហ៊ុន Angkor Air កំពុងផ្ដោតជាសំខាន់ទៅលើការហោះហើររវាងខេត្តសៀមរាប និងខេត្តព្រះសីហនុ ប៉ុន្តែក្រុមហ៊ុនអាកាសចរណ៍នេះមិនទាន់បានសម្រេចអំពីលទ្ធភាពនៃការចាប់ផ្ដើមការហោះហើររវាងខេត្តព្រះសីហនុ និងក្រុងភ្នំពេញនៅឡើយទេ។

លោក វ៉ាន់ ចាន់ទី ជាអនុប្រធានហិរញ្ញវត្ថុនៅក្រុមហ៊ុនអាកាសចរណ៍ Angkor Air បានបដិសេធមិនធ្វើអត្ថាធិប្បាយទេ ហើយបង្វែរសំណួរទាំងអស់ទៅរដ្ឋលេខាធិការដ្ឋានអាកាសចរណ៍ស៊ីវិលវិញ។

លោក សយ សុខន ជាអនុរដ្ឋលេខាធិការនៃរដ្ឋលេខាធិការដ្ឋានអាកាសចរណ៍ស៊ីវិលបានបញ្ជាក់ថា ក្រុមហ៊ុនអាកាសចរណ៍ Angkor Air កំពុងរៀបចំជើងហោះហើររវាងខេត្តសៀមរាប និង ខេត្តព្រះសីហនុមែន ប៉ុន្តែលោកបានបដិសេធមិនផ្ដល់ព័ត៌មានលម្អិតទេ។

កាលពីដើមខែនេះ ក្រុមមន្ត្រីមកពីក្រសួងទេសចរណ៍ ក្រុមហ៊ុនអាកាសចរណ៍ Cambodia Angkor Air និងក្រុមហ៊ុន Societe Concessionaire des Aeroports ដែលជាក្រុមហ៊ុន គ្រប់គ្រងអាកាសយានដ្ឋានជាតិ បានរៀបចំកិច្ចប្រជុំមួយដែលអំឡុងពេលនោះក្រុមហ៊ុនអាកាសចរណ៍នេះបានប្រកាសពីចំណាប់អារម្មណ៍របស់ខ្លួននៅក្នុងការចាប់ផ្ដើមការហោះហើរទៅកាន់ខេត្តព្រះសីហនុ នេះបើយោងតាមអ្នកចូលរួមម្នាក់នៅឯកិច្ចប្រជុំនោះ។

សមាជិកវិស័យឯកជនមានការខកចិត្តយ៉ាងខ្លាំងចំពោះភាពយឺតយ៉ាវនៅក្នុងការចាប់ផ្ដើមជើងហោះហើរទៅកាន់ខេត្តព្រះសីហនុ ។ ភាគច្រើនជឿថាក្រុមនេះនឹងអភិវឌ្ឍទៅជាគោលដៅឆ្នេរសមុទ្រមួយដែលមានការទទួលស្គាល់ទូទាំងពិភពលោក តែនៅពេលដែលភ្ញៀវទេសចរអាចចូលទៅដល់ទីនោះតាមផ្លូវអាកាសបានប៉ុណ្ណោះ។

អ្នកវិភាគនានានិយាយថា មានទីផ្សារដើម្បីគាំទ្រដល់ការហោះជាប្រចាំទៅខេត្តព្រះសីហនុ។

យោងតាមរបាយការណ៍មួយដែលចេញផ្សាយកាលពីខែមករា ដោយលោក ហ្វ្រិតដឺរីក ថូម៉ាស ជាសេដ្ឋវិទូនៅសាជីវកម្មហិរញ្ញវត្ថុអន្តរជាតិដែលជាសាខាផ្នែកឯកជនរបស់ធនាគារពិភពលោកបានឱ្យដឹងថា ចំនួនភ្ញៀវដែលទៅទស្សនាខេត្តសៀមរាប និងខេត្តព្រះសីហនុ អំឡុងការស្នាក់នៅរបស់ពួកគេនៅក្នុងប្រទេសកម្ពុជា ជាហេតុផលដែលគួរចាប់ផ្ដើមជើងហោះហើរជាប្រចាំរវាងគោលដៅទាំងពីរនេះ។

របាយការណ៍នេះបានលើកឡើងថា ក្នុងចំណោមភ្ញៀវទេសចរអន្តរជាតិទាំងជាង១៥០.០០០នាក់ ដែលទៅទស្សនាខេត្តព្រះសីហនុជារៀងរាល់ឆ្នាំនោះមាន៣៣.២ភាគរយ ដែលទំនងជាធ្វើដំណើរទៅខេត្តសៀមរាបដែរ ។ របាយការណ៍នេះបានព្យាករណ៍ថា ចំនួនមនុស្សដែលធ្វើដំណើរក្នុងមួយសប្ដាហ៍រវាងខេត្តព្រះសីហនុ និងខេត្តសៀមរាបនឹងស្ថិតនៅក្នុងចន្លោះពី១៦១នាក់ដល់៣១៩នាក់ អាស្រ័យលើរដូវកាល។

លោក លូ ម៉េង ជាប្រធានសមាគមសណ្ឋាគារកម្ពុជាបានមានប្រសាសន៍ថា "នៅពេលដែលយើងមានជើងហោះហើរទៀងទាត់ជាប្រចាំហើយនោះទីភ្នាក់ងារទេសចរណ៍នានានឹងបង្កើតកម្មវិធីទេសចរណ៍ថ្មីៗ" ។ លោកបានបន្ថែមថា ផ្លូវហោះហើររវាងខេត្តព្រះសីហនុ និងខេត្តសៀមរាប ក៏នឹងផ្ដល់ឱកាសសម្រាប់ការដឹកជញ្ជូនទំនិញ ដូចជាគ្រឿងសមុទ្រស្រស់ៗពីតំបន់ឆ្នេររបស់កម្ពុជានេះផងដែរ។

បច្ចុប្បន្ននេះសណ្ឋាគារជាច្រើននៅក្នុងខេត្តសៀមរាបនាំចូលគ្រឿងសមុទ្រពីប្រទេសថៃ ម៉ាឡេស៊ី និងវៀតណាម។

លោក ម៉េង បានមានប្រសាសន៍ថា "ជើងហោះហើរទៅកាន់ខេត្តព្រះសីហនុ ក៏នឹងបើកទីផ្សារសម្រាប់ភ្ញៀវទេសចរណ៍ទៅកាន់ទីកន្លែងនានា ដូចជាខេត្តកែប និងខេត្តកំពតផងដែរ ដែលខេត្តទាំងពីរនេះមិននៅឆ្ងាយប៉ុន្មានពីអាកាសយានដ្ឋានអន្តរជាតិខេត្តព្រះសីហនុឡើយ។

លោកបានមានប្រសាសន៍ថា "គ្រប់គ្នាបានត្រៀមលក្ខណៈអស់ហើយ ។ ពួកគេគ្រាន់តែរង់ចាំឱ្យជើងហោះហើរចាប់ផ្ដើមប៉ុណ្ណោះ"៕

## *Retirement...*

Continued from page 8

When asked why some judges and prosecutors who reached retirement age were forced to retire when others were permitted extensions, Judge Pich declined to elaborate, saying only that the extension was based on ability and physical health.

Among those forcibly retired this year is former Ratanakkiri deputy provincial court president, Judge Thor Saran. Mr Saran had come to loggerheads in recent years with human rights groups and villagers who claim he has repeatedly threatened to jail land dispute protesters.

According to provincial court President Lou Sou Sambath, Mr Saran's retirement is due solely to his reaching the age of 60.

# បុណ្យអុំទូកនៅហ្វីឡាដែលហ្វៀ



រៀបចំដោយវត្តព្រះពុទ្ធរង្សី
ថ្ងៃសៅរ៍ ទី១០ ខែកញ្ញា ឆ្នាំ០១១
នៅផែនឡែនឌីង មហាវិថី គូឡុមប៊ុស

## The Southeast Asian Dragon Boat Festival

**PENN´S LANDING**
**PHILADELPHIA, PA**
**SATURDAY, SEPTEMBER 10, 2011**
**11:00 AM - 5:00PM**

EXCITING DRAGON BOAT RACES ♦ FOOD ♦ ASIAN MARKETPLACE ♦ CULTURAL ENTERTAINMENT

contact :
Song Phou 267-978-3379
www. southeastasiandragonboatfestival.org

សូមអញ្ជើញនាំក្រុមគ្រួសារ និងញាតិមិត្តខ្មែរ និងបរទេសមករួមកំសាន្តការ
ប្រណាំងទូក-ភ្លក់ម្ហូបអាហារ -មើលការតាំងលក់វត្ថុអនុស្សាវរីយ៍ ផ្សារអាស៊ី
មានបង្ហាញសិល្បៈ វប្បធម៌ និងភ្លេងចម្រៀងខ្មែរ

Sponsored By







Presented By

| KHMER BUDDHIST HUMANITARIAN ASSOCIATION, INC. | SOUTHEAST ASIAN DRAGON BOAT FESTIVAL COMMITTEE |
|---|---|